# ខ្មែរប៉ុស្តិ៍ ស.រ.អា

# KhmerPost USA

Printing The Cambodian World News

VOL. 05 ISSUE 83 May 20th - June 2th, 2011



សុបិន : (267) 253-3947, សែម : (781) 244-0522

**MASSACHUSETTS**
217 APPLETON ST.
LOWELL, MA 01852
**PENNSYLVANIA**
P.O.BOX 24357
PHILADELPHIA, PA 19120
**RHODE ISLAND**
**NEW JERSEY**


| មាតិកាអត្ថបទ | ទំព័រ |
|---|---|


## គ្រួសារលោក តាំង ផេង ដឹកនាំការតវ៉ាឱ្យបង្កើនក្រុមពន្លត់ភ្លើង

●●● ក្រុមគ្រួសារលោក តាំង ផេង កាលពីថ្ងៃទី៩ ខែឧសភាកន្លងទៅនេះ បានដឹកនាំកិច្ចតវ៉ាមួយជូនសមុខឱ្យសមាគមខ្មែរ-ចលនា One Love Mouvement ហើយនិងគម្រោង Media Mobilising Progect ដើម្បីទាមទារឱ្យបើកស្ថានីយកងពន្លត់អគ្គិភ័យ ដែលទើបនឹងត្រូវកាត់បន្ថយនាពេលថ្មីៗនេះ។

លោក តាំង ផេង នឹងភរិយាអ្នកស្រី ហួរ សោ បានរងគ្រោះក្នុងអគ្គិភ័យមួយដែលឆាបឆេះយកផ្ទះរបស់លោកនិងលោកស្រី និងជីវិតកូនប្រុសសម្លាញ់២រូប អាយុ៩ឆ្នាំ និង៥ឆ្នាំ កាលពីថ្ងៃទី២២ ខែកុម្ភៈ ឆ្នាំ២០១១នេះ លោកនិយាយប្រាប់អ្នកកាសែតថា "លោកមានការសោកស្តាយខ្លាំងណាស់ចំពោះការបាត់បង់ជីវិតកូនទាំងពីរ ដោយសារគ្មានការសង្គ្រោះពន្លត់ភ្លើងឱ្យទាន់ពេលវេលា"...។

តទៅទំព័រទី ១១

## Children of Bassac from Phnom Penh Performed in Lowell

*-By Audria Chea*

Lowell Mass—April 23rd, Cambodian New Year celebration at the Lowell Senior Center had performances by the Lowell Angkor Dance Troupe with the touring Cambodian troupe, Children of Bassac from Cambodia Sophy Steber, the attending guest shared that the Children of Bassac whose dance troupe is part of the Cambodian Living Art, based in a slum area of Phnom Penh. Samkhann Khoeun, a board member of Cambodian Living Art and Angkor Dance troupes as well as a co-founder of the Cambodian Expression since 2004 reported, "The morning event was free and open to public where about 500 people attended the New Year event; follow by the evening fundraising event benefit to the Children of Bassac, at Sunnyda Restaurant with 300 guests filled up the evening function.

Malia Keo, 13 years old from Newton, a member of Lowell Angkor Dance Troupe said about the Children of Bassac and their performances, "They are very good. They are more discipline in their training. Plus they are professionally trained. They are passionate about their dances." Keo begin her training with the Lowell Angkor Dance Troupe two years ago. Sopheanee Phou-Khoeun, a 12 years old Angkor Dance Troupe of 6 years also shared her

*(Continued on page 12)*

## បោះឆ្នោតសម្រាប់តំណែងនៅសាលាក្រុងហ្វីឡាដែលហ្វៀជុំទី១

●●● ការបោះឆ្នោតជុំទី១ នាថ្ងៃអង្គារ ទី១៧ ខែឧសភា នៃការប្រកួតតំណែងអភិបាលក្រុង គណៈក្រុមប្រឹក្សាក្រុង និងគណៈក្រុមប្រឹក្សា Council at large គឺជាការប្រកួតជម្រុះ

តមកទំព័រទី ០៤




# ពេទ្យធ្មេញសម្រាប់គ្រួសារ ហួ ឌួង

**466 Merrimack Street. Lowell, MA 01854**
**( Near City Hall )/ 978-441-1005**

## HOA DUONG, D.M.D., P.C.

**GENERAL DENTISTRY**

គ្រូពេទ្យជំនាញនិងមានបទពិសោធន៍
ច្រើនឆ្នាំក្នុងការពិនិត្យ
ថែរក្សា និងព្យាបាលជម្ងឺធ្មេញទូទៅ



Open: Monday, Tuesday, Wednesday, and Friday
from 10 a.m. – 6 p.m.
Saturday: from 10 a.m. – 4 p.m.
Closed: Thursday & Sunday
We accept all dental insurance & Medicaid



យើងទទួលយកគ្រប់ក្រុមហ៊ុន
ធានារ៉ាប់រងសុខភាព និងការធានារ៉ាប់រង
សុខភាពមនុស្សចាស់

**យើងបើកទ្វារទទួលភ្ញៀវ ៥ថ្ងៃ ក្នុងមួយសប្តាហ៍**
**បិទទ្វារ : ថ្ងៃព្រហស្បត្តិ៍ និងថ្ងៃ អាទិត្យ**

**ទូរស័ព្ទដើម្បីណាត់ជួប (978) 441-1005**
**ម៉ោងធ្វើការពីម៉ោង 10ព្រឹក ដល់ 6ល្ងាច**
**ថ្ងៃសៅរ៍ ពីម៉ោង 10ព្រឹក ដល់ 4រសៀល**
**យើងមានបុគ្គលិកនិយាយភាសាខ្មែរ**



# ទិវាស្វែងយល់អំពី សុខភាពសម្រាប់ ស្ត្រី អាស៊ី-អាមេរិកាំង ឆ្នាំទីប្រាំពីរ



## ថ្ងៃសៅរ៍ ទី៤ ខែមិថុនា ឆ្នាំ២០១១

**ម៉ោង ១០ ព្រឹក ដល់ ២:៣០ រសៀល**

**នៅសណ្ឋាគារ Sheraton Philadelphia City Center Hotel**

**អាស័យដ្ឋាន៖ 17th & Race Streets, Philadelphia**

*សិក្ខាសាលាស្តីអំពីសុខភាពស្ត្រី មានជាភាសាអង់គ្លេស និងភាសាអាស៊ីផ្សេងៗ ដោយឥតគិតថ្លៃ

*ភូមា • ខ្មែរ • ចិនកុកងឺ • ចិនកន្តាំង • គូចារ៉ាទី • ហ៊ិនឌី • ឥណ្ឌូណេស៊ី • កូរ៉េ • មេឡាយ៉ាឡាំ • ណេប៉ាល់ • វៀតណាម*

*សិក្ខាសាលាសម្រាប់អ្នកនៅរស់ពីរោគមហារីក និងអ្នកមើលថែរបស់ពួកគេ ដោយឥតគិតថ្លៃ

*នឹងផ្តល់ជូននូវអាហារពេលថ្ងៃ

*មានគ្រឿងកំសាន្តពីសហគមន៍អាស៊ី

*មានព័ត៏មានផ្សេងៗអំពីសហគមន៍អាស៊ី

*ចុះឈ្មោះថតសុដន់ការពាររោគមហារីក (mammograms) ដោយឥតគិតថ្លៃ




THE OFFICIAL SPONSOR OF BIRTHDAYS.®




cancer.org | 1.800.227.2345
komenphiladelphia.org | 215.238.8900



**លិខិតបំពេញដើម្បីចុះឈ្មោះ**

សូមផ្ញើលិខិតចុះឈ្មោះនេះមកវិញឲ្យទាន់ **ថ្ងៃសុក្រ ទី២៧ ខែឧសភា ឆ្នាំ២០១១**

ឈ្មោះ៖ ______________________ លេខទូរស័ព្ទ៖ ______________

អាស័យដ្ឋាន៖ ______________ ទីក្រុង៖ __________ រដ្ឋ៖ ____ លេខតំបន់៖ __________

*សូមរើសយកសិក្ខាសាលាតែមួយគត់៖

☐ សិក្ខាសាលាសម្រាប់សុខភាពស្ត្រីទូទៅ ឬ ☐ សិក្ខាសាលាសម្រាប់អ្នកនៅរស់ពីរោគមហារីក និងអ្នកមើលថែរបស់ពួកគេ

សូមផ្ញើទៅ៖ Wan Ling Hung, American Cancer Society, 1626 Locust Street, Philadelphia, PA 19103
ទូរសារ៖ 215.985.5406 ទូរស័ព្ទ៖ 215.985.5307 (ភាសាអង់គ្លេស)

ទូរស័ព្ទ៖ Cambodian Association of Greater Philadelphia, 215.324.4070 (ខ្មែរ) ឬ PASSi, 215.572.1234 (ភាសាខ្មែរ)

សូមថ្លែងអំណរគុណជាពិសេសដល់៖










(Cambodian)

តមកពីទំព័រទី ០១

# បោះឆ្នោតសម្រាប់តំណែង...

យកតែបេក្ខជននៃគណបក្សតែម្នាក់មកប្រកួតនឹងគណបក្សផ្សេងតែម្នាក់ដូចគ្នា ។

ករណីបច្ចុប្បន្នអភិបាលក្រុង ម៉ាយកិល ណាទ័រ មានគូរប្រជែងខាងគណបក្សប្រជាធិបតេយ្យ ទើបចេញពីគុកផង មានបញ្ហាចម្រូងចម្រះច្រើនឈ្មោះ ស្រ៊ីត ម្លោះហើយឈ្នះយ៉ាងងាយស្រួល រហូតដល់គឺ ៧៦ភាគរយទល់២៣ភាគរយ ។ ប៉ុន្តែខាងគណបក្សសាធារណៈរដ្ឋដែលចង់បានតំណែងអភិបាលក្រុងដែរ មាន២នាក់ប្រជែងគ្នារវាង Mis Brown ដែលឈ្នះបាន៥០ភាគរយលើ FEATHERMAN ដែលបានតែ៤៩ភាគរយ ដូច្នេះនៅខែវិច្ឆិកា តំណែងអភិបាលក្រុងនឹង មានការប្រកួតរវាងពីរនាក់ គឺលោក ណាទ័រ នឹងអ្នកស្រី ប្រោន ។

អ្នកទាំងពីរនាក់នេះ បានសំដែងការយកចិត្តទុកដាក់សហគមន៍ខ្មែរ នាឱកាសចុងក្រោយនេះ ដូចជាម៉ាយកិល ណាទ័រ បានតែងតាំងខ្មែរ បីរូបឱ្យតំណែងជាអធិការរបស់អភិបាលក្រុង ហើយនឹងលើកទង់ជាតិខ្មែរ ឱ្យបក់ស្មើមុខនឹងប្រទេសដទៃនាដើមឆ្នាំនេះ រីឯអ្នកស្រី ការេន ប្រោន បានមកចូលរួមគាំទ្របាតុកម្មនៅផ្ទះឆេះរបស់លោក តាំង ផេង ចូលសម្ដែងការលើកទឹកចិត្តខួបទី៤របស់គណបក្សសិទ្ធិមនុស្ស។ នេះជាការរីកចំរើនចំពោះសហគមន៍ដែលមានការទំនាក់ទំនងពីអ្នកនយោបាយ វានៅសល់តែអ្នកបោះ ឆ្នោតដើមកំណើតជាខ្មែរ តើបានធ្វើអ្វីខ្លះហើយ ដើម្បីចងអ្នកនយោបាយឱ្យចង់បំរើប្រយោជន៍ខ្មែរវិញនោះ?

Council
1st District Democrats




គេឃើញមានបេក្ខភាពរបស់ជនអាស៊ីពីររូប គឺ១-ដេវីដអូ ដែលឈរខាងគណបក្សសាធារណៈរដ្ឋ ក្នុងនាទី Council At Large បានទទួលការគាំទ្រខ្ពស់ជាងគេ១៨ភាគរយលើស ប៊ីល គ្រីន ខាងគណបក្សប្រជាធិបតេយ្យ ដែលបានតែ១៤ភាគរយ ទី២- អេនឌី ថយ



ដែលឈរក្នុងនាទី Council តែពុំបានជាប់ឈ្មោះទេ តែអ្នកទាំងពីរ បើទោះជាដើមកំណើតជាចិន តែមានទំនាក់ទំនងជាមួយសហគមន៍ខ្មែរយ៉ាងជិតស្និត ៕

**ខ្មែរប៉ុស្តិ៍**

## 2nd District Democrats







## 6th District Democrats







## 7th District Democrats







## 8th District Democrats






# ហោ ណាំហុង ប្តឹង សម រង្ស៊ី នៅតុលាការបារាំង

●លោក ហោ ណាំហុង រដ្ឋមន្ត្រីការបរទេសខ្មែរ ដែលបានដាក់ពាក្យប្តឹងចំពោះលោក សម រង្ស៊ី ប្រធានគណបក្សប្រឆាំងនៅតុលាការក្រុងប៉ារីស ហើយធ្លាប់បានទទួលសេចក្តីសម្រេចឱ្យឈ្នះក្តីកាលពីថ្ងៃទី២០ ខែឧសភា ឆ្នាំ២០១០ បានត្រូវលោក សម រង្ស៊ី ទាមទារឱ្យឡើងតុលាការកំពូលជាថ្មីម្តងទៀត ។ ថ្ងៃទី២៧ ខែមេសា ឆ្នាំ២០១១នេះ តុលាការកំពូលបារាំង បានផ្តល់សេចក្តីសម្រេចជាចុងក្រោយ ដោយមិនបើកសិទ្ធិឱ្យទៅបន្តបណ្តឹងបានតទៅទៀតថា "បណ្តឹងរបស់លោក ហោ ណាំហុង មិនអាចទទួលបាន" ។ នេះជាសេចក្តីសម្រេចដែលធ្វើឱ្យលោក ហោ ណាំហុង ចាញ់ក្តីលោក សម រង្ស៊ី វិញ ដែលបណ្តឹងរបៀបនេះ លោករដ្ឋមន្ត្រីការបរទេសខ្មែរ ក៏ធ្លាប់ឈ្នះលើសម្តេចនរោត្តម សីហនុ អតីតព្រះមហាក្សត្រខ្មែរម្តងរួចទៅហើយផងដែរ ។



សម រង្ស៊ី



ហោ ណាំហុង

សាក្សី និងភស្តុតាងជាច្រើនបានចង្អុលថា នាអតីតកាលលោក ហោ ណាំហុង ធ្លាប់មានតួនាទីសំខាន់នៅគុកបឹងត្របែកនាជំនាន់ខ្មែរក្រហមមែន ហើយធ្លាប់មានឥទ្ធិពលស្លាប់រស់លើអ្នកទោសខ្លះទៀតផង ។ នៅពេលដែលអត្ថបទលោក សម រង្ស៊ី បានត្រូវចោទប្រកាន់ថា ជាអត្ថបទបរិហាកេរ្តិ៍ រំលោភសិទ្ធិជាឯកជននោះ ពេលនោះលោក ហោ ណាំហុង ជារដ្ឋមន្ត្រី ដែលជាមនុស្សសាធារណ ហើយត្រូវអ្នកនយោបាយចោទប្រកាន់ភ្ជាប់ទៅនឹងព្រឹត្តិការណ៍ប្រវត្តិសាស្ត្រ ដែលតុលាការអន្តរជាតិខ្មែរក្រហមកំពុងតែធ្វើការវិនិច្ឆ័យទៀតផង ។ *-ខ្មែរប៉ុស្តិ៍-*

**ព័ត៌មានបន្ថែម** : លោក សម រង្ស៊ី នឹងមកដល់ទីក្រុងហ្វីឡាដែលហ្វៀ ប្រាស្រ័យទាក់ទងនឹងសហគមន៍ខ្មែរ ថ្ងៃទី២៧ ខែឧសភា ឆ្នាំ២០១១ វេលាម៉ោង៦ល្ងាច នៅវត្តផ្លូវ លេខ៦ ព្រះពុទ្ធរង្ស៊ី ៕

# ជប់លៀងសម្រាប់ជួយមន្ទីរពេទ្យកុមារនៅអង្គរសៀមរាប

●●ពិធីជប់លៀងមួយនឹងរៀបចំឡើងនៅថ្ងៃសៅរ៍ ទី៤ ខែមិថុនា ឆ្នាំ២០១១ នៅសាល Cannstat Ter Volksfast - Veven 9130 Academy Road ដោយមិត្តរបស់មិត្តគ្មានព្រំដែននៅហ្វីឡាដែលហ្វៀ ដែលនឹងរៀបចំពិធីនេះ ជាលើកទី៧ ដើម្បីប្រមូលថវិកាទៅជួយពេទ្យកុមារមួយសម្រាប់ការព្យាបាលដោយមិនយកកម្រៃនៅខេត្តសៀមរាប ។ ក្រុងហ្វីឡាដែលហ្វៀ តែងតែផ្តល់ដល់ការអង្គាសប្រាក់នេះប្រមាណជា១ម៉ឺនដុល្លារ ជារៀងរាល់ឆ្នាំដែលជាទំហំតូច ប៉ុណ្ណោះសម្រាប់ចំណាយទាំងមូលប្រចាំឆ្នាំតែជាវិភាគទានដ៏ស្មោះសរពីសហគមន៍ដែលពុំសូវសម្បូរដោយអ្នកមានប្រាក់ច្រើន ។ សំបុត្រចូលរួម៦០ដុល្លារ ។ បើចង់បានព័ត៌មានបន្ថែមសូមទូរស័ព្ទទៅ ថាច់ លៀប 215-360 9841 កល្យាណ សុខ 267-267 6833 ៕




KhmerPost USA, LLC
East Coast Publication

**Pin Samkhon,**
*Publisher & Editor-in-Chief*
Email: pinsamkhon@gmail.com
*Staff Writers:* **Loeum Im, Audria Chea, Sovan Heng**

*Contributed Writers:*
**Mam Yin, Kim Phien, Lanica Angpak, & Dannely Sam**
KhmerPostLowell@gmail.com

**Soben Pin**
*Marketing Director*
KhmerPostUSA@gmail.com
**267-253-3947**
**Sam Khoeun**
*Sales Consultant*
**(781) 244-0522**

*Design Staffs:*
**Leang Heng & Doch Vuthy**
~~~~~
KhmerPost USA, LLC is an independent newpaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local, community, and national news; and give an insight into Cambodia & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Pennsylvanian & Massachusett.
~~~~
Semimonthly edition subscription is available within the U.S. & Canada at $60.00 and 70 Euros in Europe per year. Money order or check is accepted and made payable to:
U.A.M.G.
P.O. Box 24357
Philadelphia, Pa 19120
~~~
~~~

# បញ្ចប់ជីវិត ប៊ីនឡាដិន បញ្ហានៅច្រើននៅឡើយ

ដោយ : គិម វិមល

•កូនប្រុស ប៊ីនឡាដិន ឈ្មោះ អូម៉ា អាយុ៣១ឆ្នាំ រៀបការនឹងស្ត្រីជនជាតិអង់គ្លេសម្នាក់ មានបំណងនឹងប្តឹងប្រធានាធិបតីអាមេរិកាំង លោក អូបាម៉ា ពីការដែលកុម្មង់ដូ យោធាអាមេរិកាំង ចូលទៅសម្លាប់ឪពុករបស់គេ ហើយយកសាកសពនោះ ទៅទម្លាក់ចោលនៅមហា


ប៊ីនឡាដិន



អូបាម៉ា

សមុទ្រ ។ អូម៉ា និយាយថា "បើទោះជាកត្តាមនុស្ស ឬកត្តាសាសនាក៏ដោយការយកសាកសពមនុស្សកំរិតដែលពួកគេបានគោរពនោះ ទៅបោះចោលក្នុងទឹកនោះ ជាការគួរឱ្យអាម៉ាសដល់ក្រុមគ្រួសារ និងក្រុមសាវ: ដែលនាំឱ្យបន្ថោកតម្លៃដល់មនោសញ្ចេតនារបស់ក្រុមមុយសុលម៉ង់រាប់រយលាននាក់" ។

ប៊ីនឡាដិន ត្រូវគេសម្លាប់បាននៅទីអគារដ៏ស្តុកស្តម្ភមួយកាលពីថ្ងៃទី២ ខែឧសភា ឆ្នាំ២០១១ ថ្មីៗនេះ ដែលជាទីបញ្ជាការលួចលាក់ដ៏ធំចំនួនប្រាំឆ្នាំមកហើយ នៅខាងជើងជាយក្រុងអ៊ីស្លាម៉ាបាត ។ រូបភាពនេះ បានធ្វើឱ្យរដ្ឋបាលអាមេរិកាំងផ្ទុះកំហឹង ហើយចោទរដ្ឋបាលបាគីស្ថាន ដែលអាមេរិកាំងជួយ២ពាន់លានក្នុងមួយឆ្នាំថា មានការឃុបឃិត លាក់ ប៊ីនឡាដិន មិនឱ្យរកឃើញរហូតទាល់តែអាមេរិកាំងរកឃើញដោយខ្លួនឯងទៅវិញ ។

**ចំណុចខ្លាំងដែលអាចនាំទៅរកច្រកចេញផុតពីសង្គ្រាមនៅអាហ្វហ្គានីស្ថាន**

គេសង្ឃឹមថា នឹងមានការសម្រួលបរិបទដ៏ទូលំទូលាយក្នុងដំណោះស្រាយលើបញ្ហាអាហ្វហ្គានីស្ថាននៅឱកាសដែលពួកតាលីបាន អាចត្រូវគេអញ្ជើញឱ្យត្រឡប់ចូលទៅចរចារកាន់អំណាចឡើងវិញ ។ មូរណភាពរបស់ ប៊ីនឡាដិន នេះបានបង្កើតច្រកទ្វារមួយថ្មីឆ្ពោះទៅរកដំណោះស្រាយក្នុងតំបន់។ ប៊ីនឡាដិន ស្លាប់នាំយកអាល់កៃដា ដែលជាក្រុមភេរវកម្មអន្តរជាតិទៅជាមួយផង វាពុំត្រូវអាចមានអ្វីទៀតឡើយ ដែលជាបញ្ហាចម្បងក្នុងកិច្ចចរចារជាមួយពួកតាលីបាន ព្រោះក្រុមភេរវករអន្តរជាតិ ពុំមែនកើតពីតាលីបានទេ ។

ដូច្នេះ តម្រូវម្យ៉ាងទៀតនុះ គឺសម្រួលបរិបទរបស់ជនជាតិភាគតិច ប៉ាច់ទូន (PACHTOUN) ដែលបាគីស្ថានរក្សាទុកជាថ្នូនយោបាយតាមរយ: ប៊ីនឡាដិន ពីមុនមក។

លោកប្រធានាធិបតី អូបាម៉ា សន្និដ្ឋានថា "វាជានិមិត្តរូបមួយថ្មី ហើយវាក៏បង្ហាញច្រកចេញពីបញ្ហាដំណោះស្រាយនៅអាហ្វហ្គានីស្ថាន... ប៊ីនឡាដិន វាជាឧបសគ្គរហូតប៉ុន្មានថ្ងៃនេះ ។ នៅប៉ាគីស្ថានឯណោះវិញ ចង់ពួកគេមានបញ្ហារវាងគ្នានឹងគ្នាក្នុងកម្រិតណាក៏ដោយក៏បញ្ហាទាំងប៉ុន្មាន វាបានត្រូវចងមុខជាប់ជាស្រេចទៅហើយមកទល់នឹងពេលនេះ ។

ការសម្លាប់ ប៊ីនឡាដិន បានបង្កើតឱ្យមានការផ្លាស់ប្តូរនយោបាយ និងបរិយាកាសថ្មីស្រឡាញ់ នៅពេលលោកប្រធានាធិបតី បូស្ស បានចាត់ទុកថា អាល់កៃដាជាដំបៅ និងជាសត្រូវលេខមួយរបស់សហរដ្ឋអាមេរិក។ ដូច្នេះ បូស្ស បានបង្កើតថ្នាលចិញ្ចឹម និងបង្កើតអាល់កៃដាឱ្យរីកសុះសាយ ។

អ្នកវិភាគនយោបាយ បានបញ្ជាក់នៅសេតវិមានថា "អូបាម៉ា បានចាត់ទុក ប៊ីនឡាដិន ជាសត្រូវលំដាប់ថ្នាក់លេខ១" ទៅវិញ ។ វាខុសស្រឡ:ពីការអះអាងរបស់លោកកាលនៅកំពុងបោះឆ្នោត ។ តាំងពីឆ្នាំ១៩៨០មក ប៊ីនឡាដិន បានបំរើនយោបាយ ប៉ាគីស្ថាន ដោយសង្ឃឹមថា នឹងអាចធ្វើឱ្យអាហ្វហ្គានីស្ថាន មានស្ថានភាពល្អទៅវិញបានថ្ងៃណាមួយ។ ម្យ៉ាងវិញទៀតមរណភាពនេះ បានឈប់ផ្តល់ប្រយោជន៍ឱ្យនរណាម្នាក់ទៀតឡើយ ។ ពពួក ចារកម្មមានជំនឿរហូតហ៊ានថា "ប៊ីនឡាដិន ត្រូវបានគេលក់" ។

នៅទីបំផុតអ្នកវិភាគបានកំណត់ថា "ប្លុកអុកស៊ីដង់បានប្រញាប់ប្រញាល់យកមរណភាពនេះ ជាភាគមួយនៃជោគជ័យរបស់គេ"។ លោក (LEON PANNETA) ឡេអុង ប៉ាណេតា ដែលជាចាងហ្វាង CIA ប្រាប់យើងឱ្យដឹង "វាសឹងតែច្បាស់ទៅហើយ ដែលថាមរណភាពនេះ អាចបង្កើតសកម្មភាពវាយប្រហារសងសឹកពីក្រុងឬពីពពួកផ្សេងនៃប្រព័ន្ធអាល់កៃដានៅតំបន់ផ្សេងៗ" ។





ទោះជាយ៉ាងណា គេនៅពុំទាន់ច្បាស់ថា ការបាញ់សម្លាប់ ប៊ីនឡាដិន វាជាហេតុការណ៍ចេតនា ឬជាចៃដន្យ ដែលមានសឹងក្នុងរាល់ការប្រយុទ្ធ ។ តែគួរកត់សំគាល់ថា ក្រុមកុម្មង់ដូឈ្មោះ "TEAM SEALS" នេះត្រូវបានបង្វឹកបង្វឹនសម្រាប់កំទេច ឬរំលាយដូចស៊ុម ដែលកំណត់ជាទុកជាមុនស្រេច ។ បន្ថែមលើនេះ គឺការពន្យល់ហេតុផលសរុប ដោយសេតវិមានហាក់ដូចជាត្រឡប់ត្រឡិន ពុំច្បាស់លាស់ឡើយ ៕

# ខួបទី៤នៃគណបក្សសិទ្ធិមនុស្សនៅហ្វីឡាដែលហ្វៀ

•••មនុស្សប្រមាណ៣០០នាក់បានជួបជុំគ្នានៅថ្ងៃសុក្រទី១៣ ខែឧសភា នារាត្រីសមោសរមួយ ដែលសមាជិកគណបក្សសិទ្ធិមនុស្សកម្ពុជារៀបចំរំលឹកខួបទី៤នៃកំណើតគណបក្សរបស់គេ។

លោក កឹម សុខា ជាប្រធានគណបក្សសិទ្ធិអមដោយភរិយាបានអញ្ជើញមកពីក្រុងភ្នំពេញ ជាកិត្តិយសក្នុងពិធីនេះដែរ។

មានការតុបតែងជាពិសេសនៅភោជនីយដ្ឋាន GOLDEN PALACE ប្រកបដោយបដារ និងទង់ជាតិចម្រុះពណ៌ ដើម្បីទទួលប្រធាន និងបណ្ដាក្រុមសមាជិកសាខាបក្សមកពីតំបន់សំខាន់ៗដូចជា កាលីហ្វ័រញ៉ា, តិចសាស ឬឈីកាហ្គោ... ។ល។ ដ៏គួរឱ្យចាប់ចិត្ត។

ឱ្យកត់សំគាល់នារាត្រីនោះ គឺវត្តមាននៃសមាជិកថ្មីម្នាក់ជាអតីតតំណាងរាស្ត្ររបស់គណបក្ស សម រង្ស៊ី គឺលោក ម៉ៅ មានីវ៉ាន់ បានពន្យល់ពីហេតុផលដែលលោកបានគេចចេញពីតំណែងតំណាងរាស្ត្រមកចូលជាសមាជិកជាន់ខ្ពស់នៃគណបក្សសិទ្ធិមនុស្សថា គឺមកពីគណបក្ស សម រង្ស៊ី មិនគោរពគោលការណ៍ប្រជាធិបតេយ្យ ផ្ដាច់ការនិយម និងបក្ខពួកនិយម នៅលើការបន្ទោសដ៏វែងទៅលើគណបក្ស សម រង្ស៊ី ច្រើនជាងបន្ទោសគណបក្សប្រជាជនដែលគួរប្រឆាំងរបស់គណបក្សសិទ្ធិមនុស្ស លោក ម៉ៅ មានីវ៉ាន់ បញ្ជាក់ថា "លោកនៅតែជាមនុស្សរបស់ប្រជាធិបតេយ្យជាដរាប"។ លោកប្រធានបក្ស កឹម សុខា បានឡើងថ្លែងការណ៍ចុងក្រោយ






លោក កឹម សុខា និងភរិយា ថតជាមួយនឹងសមាជិកសំខាន់ៗនៃគណបក្សសិទ្ធិមនុស្សនៅក្រៅប្រទេស


លោក វ៉ា សាម៉ុន ប្រធានសាខាបក្សនៅហ្វីឡាដែលហ្វៀ



លោក រឿម ឡុង ជាពិធីករ បានអញ្ជើញប្រធានសាខាបក្សនៅតំបន់ហ្វីឡាដែលហ្វៀ គឺលោក វ៉ា សាម៉ុន ដែលបានឡើងថ្លែងការណ៍ស្វាគមន៍ប្រធានបក្ស និងភ្ញៀវកិត្តិយសឯទៀត មុននឹងប្រគល់ភារកិច្ចនាយការណ៍ជាបន្តទៅប្រធានសាខាគណបក្ស...ប្រចាំអាមេរិកាខាងជើង គឺវេជ្ជបណ្ឌិត កែវ សម្បត្តិ នៅឡូវែល មាសាឈូសែត បន្ទាប់មកអនុប្រធាន ចំរើន ញ៉យ នៅឡាសវេគ្គាស សំដែងការចាប់អារម្មណ៍ និងរាយការណ៍ពីសកម្មភាពគណបក្សនៅក្រៅប្រទេស ជាពិសេសបានបង្ហាញពីការកើនចំនួននៃការគាំទ្ររបស់សាធារណជនមកលើគណបក្សសិទ្ធិមនុស្ស មកពីតំបន់ថ្មីៗ ដូចជា តិចសាស កាលីហ្វ័រញ៉ា ឬឈីកាហ្គោ ក្នុងសន្ទុះដ៏គួរឱ្យចាប់អារម្មណ៍។ លោក ប៉ែន ស៊ីដារ៉េត តំណាងមកពីបារាំង និងសភាអឺរ៉ុប ក៏បានអញ្ជើញមកឡើងថ្លែងការណ៍ដែរ តែការដែលគួរគេនាពេលភ្ញៀវឃ្លានបាយល្ងាចខ្លាំងហើយនោះ នូវប្រយោគដ៏គួរឱ្យចងចាំបាននោះថា "នៅក្នុងការស្ទង់យោបល់របស់អង្គការឯករាជ្យក្រៅរដ្ឋាភិបាលមួយបានផ្សាយថ្មីៗនេះថា គណបក្សសិទ្ធិមនុស្សទទួលការគាំទ្រចំនួន១៣ភាគរយនៃចំនួនអ្នកដែលគេបានសួរ នេះគឺជាចំនួនដែលបានកើនលើសពីពេលមុនបោះឆ្នោតលើកមុនច្រើនរួចទៅហើយ ក៏ប៉ុន្តែនៅមានចម្លើយមនុស្សមួយក្រុមទៀត ដែលមានចំនួន៣៦ភាគរយនិយាយថា ខ្លួនអាចនឹងបោះឆ្នោតឱ្យគណបក្សសិទ្ធិមនុស្សដែរ ភាពស្ទាក់ស្ទើរនេះ បើសិនជាការពិតអាចនឹងបង្កើនអ្នកបោះឆ្នោតឱ្យគណបក្សសិទ្ធិមនុស្ស លើសពី១៣ភាគរយនេះបានយ៉ាងច្រើន" លោក កឹម សុខា បន្តក្ដីសង្ឃឹមថា "បើគណបក្សបន្តប្រឹងប្រែងតទៅទៀត គណបក្សសិទ្ធិមនុស្សអាចនឹងមានសំឡេងឆ្នោតបានលើស៥១ភាគរយ ដើម្បីទៅកាន់អំណាចនៃរដ្ឋ..."។


អ្នកស្រី ប្រោន បេក្ខជនអភិបាលក្រុងហ្វីឡា

ហ្វីឡាដែលហ្វៀ គឺជាមូលដ្ឋានដ៏សំខាន់ជាងគេនៅក្រៅប្រទេសរបស់គណបក្សសិទ្ធិមនុស្ស ដែលមានសមាជិកគាំទ្រមិនតិចជាង២០០នាក់ទេ ហើយផ្ដល់ជំហរដ៏រឹងមាំដល់មូលដ្ឋានបក្សជាប្រទេសកម្ពុជារបស់ខ្លួនទាំងផ្នែកទស្សនៈធនធានមនុស្សនឹងហិរញ្ញវត្ថុ។

រាត្រីខួបកំណើតបក្សនេះបានបន្តជាមួយនឹងភោជនាហារបរិបូរណ៍ឈ្ងុយឆ្ងាញ់ កំដរដោយក្រុមតន្ត្រី "រីករាយ" ដឹកនាំដោយ វ៉ាត កូនប្រុសរបស់លោក ម៉ម យីន ហើយជាមួយនឹងការរាំកំសាន្តក៏មានការបង្ហាញសមាជិកសំខាន់ និងភ្ញៀវកិត្តិយសរបស់បក្ស នារាត្រីដែលផ្ដើមរដូវក្ដៅទើបមកដល់ជាមួយគ្នានេះដែរ៕

*-ខ្មែរប៉ុស្តិ៍-*



លោក ម៉ៅ មានីវ៉ាន់ អតីតតំណាងរាស្ត្រ



ឌី ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌី ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី១៣ ខែឧសភា ឆ្នាំ២០១១

## Judges Consider Contempt Action Over Case 003

By Douglas Gillison
THE CAMBODIA DAILY

With denunciations mounting against their apparently premature decision to conclude a case last month, investigating judges at the Khmer Rouge tribunal have begun considering proceedings for contempt of court.

It was unclear yesterday how concrete or advanced any such plans could be, but one possible target is international Co-Prosecutor Andrew Cayley, who divulged information this week to the news media about crime scenes under review in the investigation of the Khmer Rouge military, according to people briefed on the matter who spoke on condition of anonymity.

The development raised the outlandish prospect that, just as the tribunal forswears the pursuit of additional Khmer Rouge suspects, its prosecutions could instead turn inward.

The court yesterday declined to comment. Lars Olsen, legal communications officer, said he had no information about the matter. "In general, the court will not confirm or deny what is under consideration by judicial officers in terms of decision making," he said.

Co-Investigating Judge Siegfried Blunk yesterday declined to speak to a reporter. "You can write any story you like," he said. His counterpart, Judge You Bunleng, was unavailable.

Both judges on April 29 concluded their investigation in Case 003, in which air force commander Sou Met and navy commander Meas Muth are suspected of crimes against humanity. The judges have reportedly undertaken to suppress both Case 003 and Case 004.

The cases are vehemently opposed by Prime Minister Hun Sen and have received little to no public commitment from the court's financial backers or the UN.

In a statement on Monday, Mr Cayley provided the first public information on the scope of Case 003 by identifying alleged crimes and crime scenes in the investigation. He also called for members of the public who may have suffered as a result to come forward as complainants and civil parties.

The statement revealed that the investigation was of considerable scope, concerning events at sea and in Vietnam, as well as broad-based purges of Khmer Rouge cadre and crimes for which no one has yet been indicted.

By calling for additional investigative acts, it also effectively exposed the inactivity of the co-investigating judges, who had concluded their work in the case without questioning the suspects or substantial numbers of witnesses.

Court procedure explicitly authorizes the co-prosecutors to provide the public with "objective summaries" of information contained in introductory submissions, which are documents outlining the investigations they seek.

In four years of operations, the court has never applied sanctions for contempt of court to any staff member, lawyer or member of the public, though the rules say "any person" may be sanctioned for disobeying an order of confidentiality.

In his first remarks to the news media since taking office six months ago, Judge Blunk on Wednesday told Radio Australia that potential civil parties had had "ample opportunities" to participate in Case 003 through the court's victims office.

However, in 20 months, no more than four people have come forward, and no outreach campaign for Case 003 or Case 004 was undertaken.

Im Sophea, the office's head of outreach, said yesterday that he had no access to the case file.

"The victims support section only provides coordination and organization for the relevant parties to discuss and interact," he said.

*(Additional reporting by Phann Ana)*

## ការកាត់ក្ដីក្រុមមេដឹកនាំរបស់ខ្មែរក្រហមនឹងចាប់ផ្ដើមនៅខែក្រោយ

ដោយ : Douglas Gillison
THE CAMBODIA DAILY

ជាមួយនឹងចុងចោទបួននាក់ភាគីរដ្ឋប្បវេណីរាប់ពាន់នាក់ជនរងគ្រោះរាប់លាននាក់ និងកម្មវត្ថុជាច្រើននៅក្នុងប្រទេសនេះទាំងអស់ដែលប្រមូលរយៈពេលជិត៤០ឆ្នាំមកនេះ ការកាត់ទោសបក្ខពួកដែលរស់នៅរបស់លោក ប៉ុល ពត នៅទីបញ្ចប់នេះត្រូវបានគ្រោងនឹងចាប់ផ្ដើមធ្វើសវនាការរយៈពេលមួយសប្ដាហ៍នៅខែក្រោយនេះ ។






នៅក្នុងអនុស្សរណៈមួយកាលពីម្សិលមិញអង្គជំនុំជម្រះដែលមានចៅក្រម៥រូបរបស់តុលាការនេះ បានជូនដំណឹងប្រាប់ក្រុមអ្នកចូលរួមនៅក្នុងរឿងក្ដី០០២ថា ខ្លួននឹងធ្វើសវនាការជាលើកដំបូងមួយនៅថ្ងៃច័ន្ទ ទី២៧ ខែមិថុនាបន្ត សវនាការរយៈពេល៣ថ្ងៃជាប់គ្នាប្រសិនបើ ចាំបាច់ ។

លោក នួន ជា អាយុ ៨៤ ឆ្នាំដែលជាលេខារងនៃគណបក្សកុម្មុយនីស្ដកម្ពុជា លោក ខៀវ សំផន អាយុ៧៤ឆ្នាំ ជាប្រធានរដ្ឋ លោក អៀង សារី អាយុ៨៤ឆ្នាំជាមន្ត្រីក្រសួងការបរទេស និងលោកស្រី អៀង ធីរិទ្ធ អាយុ៧៨ឆ្នាំ រដ្ឋមន្ត្រីក្រសួងសង្គមកិច្ច ត្រូវបានចោទប្រកាន់ក្នុងខែកញ្ញា ពីបទឧក្រិដ្ឋកម្មប្រឆាំងមនុស្សជាតិប្រល័យពូជសាសន៍ឧក្រិដ្ឋកម្មសង្គ្រាម និងពីបទរំលោភច្បាប់កម្ពុជាក្នុងការស្លាប់មនុស្សចំនួន២,២លាននាក់ ។

ថ្វីបើសវនាការលើកដំបូង គឺជាការចាប់ផ្ដើមកាត់ក្ដីផ្លូវការក៏ដោយក៏នីតិវិធីនេះមិនទាក់ទងនឹងការចោទប្រកាន់ប្រឆាំងនឹងជនជាប់ចោទទេ ។

ក្នុងកំណត់ហេតុផ្លូវការកាលពីម្សិលមិញ លោកចៅក្រម និល ណុន ប្រធានអង្គជំនុំជម្រះបានមានប្រសាសន៍ថា សវនាការនេះនិងពិចារណាតែការជំទាស់ដំបូងពីមេធាវីចុងចោទ បញ្ជីឈ្មោះសាក្សីដែលអាចត្រូវកោះហៅនឹងការបញ្ជាក់ដោយមេធាវីភាគីរដ្ឋប្បវេណីនាំមុខពីររូបអំពីលក្ខណៈសំណងដែលត្រូវបានស្វះស្វែងដោយជនរងគ្រោះចំនួន២,០០០នាក់ ដែលជាភាគីក្នុងការកាត់ទោសនេះ ។ អ្វីដែលគេហៅថា"សវនាការពិតប្រាកដ" ដែលភស្ដុតាងប្រឆាំង និងជនជាប់ចោទនឹងត្រូវពិចារណានោះមិនត្រូវបានគ្រោងឡើងទេ ។

ក្រុមព្រះរាជអាជ្ញាភាគីរដ្ឋប្បវេណីនិងក្រុមមេធាវីចុងចោទ បានស្នើរសុំសាក្សីសរុប១.០៥៥នាក់ ដោយចំនួនជាងពាក់កណ្ដាលត្រូវបានស្នើរដោយក្រុមលោក នួន ជា តែឯង ។ ប៉ុន្ដែក្រុមចៅក្រមទំនងជានឹងកោះហៅតែមួយផ្នែកប៉ុណ្ណោះ ។

ជាការជំទាស់លើកដំបូងក្រុមមេធាវីចុងចោទការពារជាថ្មីនូវបញ្ហាជាច្រើនដែលត្រូវបានលើកឡើងអំឡុងរយៈពេល២ឆ្នាំកន្លះនៃការស៊ើបអង្កេត ។ ក្រុមមេធាវីរបស់លោក អៀង សារី និងលោក នួន ជា កំពុងសួរដេញដោលអំណាចរបស់តុលាការក្នុងការអនុវត្តន៍ច្បាប់ឧក្រិដ្ឋកម្មអន្តរជាតិ ដូចជាច្បាប់ស្ដីពីឧក្រិដ្ឋកម្មប្រឆាំងនឹងមនុស្សជាតិ និងប្រល័យពូជសាសន៍ ដែលកូនក្ដីរបស់គេត្រូវបានចោទពីបទរំលោភបំពានរវាងឆ្នាំ១៩៧៥ និងឆ្នាំ១៩៧៩ ។ ការកាត់ក្ដីនេះជាញឹកញាប់ត្រូវបានពិពណ៌នាថា ស្ថិតក្នុងចំណោមរឿងក្ដីស្មុគស្មាញបំផុត និងប្រហែលជាប្រើពេលច្រើនឆ្នាំ ៕

## ការនាំចេញសំលៀកបំពាក់កើនឡើង៤៨ភាគរយនៅត្រីមាសទី១

ដោយ : Simon Marks, THE CAMBODIA DAILY

យោងតាមតួលេខដែលក្រសួងពាណិជ្ជកម្មចេញកាលពីម្សិលមិញបានបង្ហាញថាការនាំចេញសរុបរបស់កម្ពុជាបានកើនឡើង៤៨ភាគរយដល់១,០៥ពាន់លានដុល្លារនៅក្នុងត្រីមាសដំបូងនៃឆ្នាំនេះ ខណៈដែលការនាំចេញស្បែកជើង និងការនាំចេញសំលៀកបំពាក់ទៅប្រទេសជប៉ុនបានកើនឡើងដល់ពីរដង ។ ទោះបីការនាំចេញកំពុងកើនឡើយខ្លាំងនៅឆ្នាំនេះ រហូតមកទល់ពេលនេះក៏ដោយ ក៏ទិន្នន័យនេះបានបង្ហាញថា សេដ្ឋកិច្ចកម្ពុជានៅតែមិនទាន់សំបូរបែបនៅឡើយ ដោយការនាំចេញជាង៨០ភាគរយនៃការនាំចេញទាំងអស់របស់ប្រទេសនេះ គឺជាសំលៀកបំពាក់ ។ ក្រុមសេដ្ឋវិទូបាននិយាយថា ពួកគេរំពឹងថាការនាំចេញនឹងបន្តកើនឡើងដោយសារថ្លៃចំណាយខ្ពស់នៅក្នុងប្រទេសចិនធ្វើឱ្យកម្ពុជា ក្លាយជាគោលដៅកាន់តែគួរឱ្យចាប់អារម្មណ៍សម្រាប់អ្នកផលិត ។ ការមិនយកពន្ធអាករលើទំនិញសំលៀកបំពាក់មួយចំនួនទៅកាន់អឺរ៉ុបដែលបានចូលជាធរមានកាលពីខែមករានេះ ក៏បានជួយជំរុញដល់ការនាំចេញផងដែរ ។ យោងតាមតួលេខនេះបានបង្ហាញថា ការនាំចេញសំលៀកបំពាក់ទៅកាន់អាមេរិកកើនឡើង១,៣៨ភាគរយដល់៤៨៦,១៣លានដុល្លារ អំឡុងពេលត្រីមាសដំបូងនេះ រីឯការនាំចេញសំលៀកបំពាក់ទៅអឺរ៉ុបបានកើនឡើង៦៥,៥២ភាគរយដល់១៥០,៧លានដុល្លារ ។ ការនាំចេញសំលៀកបំពាក់ទៅប្រទេសជប៉ុន ដែលបានផ្ដល់ការលើកលែងពន្ធដល់កម្ពុជា នៅឆ្នាំនេះលើទំនិញនានារួមទាំងសំលៀកបំពាក់ដែរនោះ បានកើនឡើង១៥៧,៧៧ភាគរយ ដល់២៨,៨១លានដុល្លារនៅក្នុងរយៈពេល៣ខែដំបូងនោះ ៕

# បើកហើយនៅសមាគមខ្មែរខាងត្បូងហ្វីឡាដែលហ្វៀ

# FREE LIBRARY HOT SPOT

●●●ភ្ញៀវប្រមាណ១០០នាក់ បានចូលស្តាប់សេចក្តីរាយការណ៍របស់អ្នកស្រីនាយិកាសមាគមខ្មែរ រ៉ង ស៊ិន នាឱកាសសម្ពោធបណ្ណាល័យ HOT SPOT នៅសមាគមខ្មែរ ស្ថិតនៅផ្លូវលេខ៧ ភាគខាងត្បូងក្រុងហ្វីឡា ។



នេះជាលើកដំបូងហើយដែលសហការណ៍រវាងសមគមខ្មែរជាមួយបណ្ណាល័យក្រុង បានផ្តល់លទ្ធភាព ប្រសើរសម្រាប់ឱ្យសហគមន៍ខ្មែរ ទាំងចាស់ទាំងក្មេង អាចមានឱកាសសិក្សាស្រាវជ្រាវនៅក្នុងបរិយាកាស ដែលខ្មែរអាចជួយវិស័យបច្ចេកវិទ្យាដល់ខ្មែរឯទៀត បានតាមគោលការណ៍ ដែលថា "គ្មានការរីកចំរើនណាអាចកើតឡើងដោយគ្មានការរៀនសូត្រនោះទេ"។ សមាគមខ្មែរហើយនិងបណ្ណាល័យក្រុង បានបើកចំហរវិស័យសិក្សានិងទំនាក់ទំនងដ៏ទូលំទូលាយជាមួយនឹងកុំព្យូទ័រថ្មី១ប្រមាណ១០គ្រឿង ដែលបំពាក់ប្រព័ន្ធអ៊ីនធើណេតជាស្រេចជូនដល់សហគមន៍រួចហើយ ហើយមានបំណងចង់ពង្រីកថែមទៀត បើមានសេចក្តីត្រូវការ ។ នៅសល់តែសមាជិកសហគមន៍ទេ ដែលត្រូវឆ្លើយតបថា ខ្លួនមកប្រើប្រាស់សម្ភារៈទាំងនោះដែរបះទេ?

សមាគមខ្មែរស្ថិតនៅ 2416 SOUTH 7TH STREET PHILADELPHIA, PA 19148

ទូរស័ព្ទ : **215-686-5372**

បើម៉ោងឱ្យប្រើបណ្ណាល័យមិនយកកំរៃ HOT SPOT ពីថ្ងៃច័ន្ទ ដល់ថ្ងៃសុក្រ ពីម៉ោង១:០០ ដល់ម៉ោង៥ល្ងាច ។

***-ខ្មែរប៉ុស្តិ៍-***

# ខែនៃទិវាពលរដ្ឋអាស៊ី

●ខែឧសភានេះ ជាខែដែលហ្វីឡាដែលហ្វៀ ប្រារព្ធទិវារបស់ពលរដ្ឋអាស៊ី ។ សមាគម PAN ASIAN នៅហ្វីឡាដែលហ្វៀ ក៏បានផ្សាយការជួបជុំគ្នានាឆ្នាំ ទី៥ ដើម្បីបង្ហាញ សិល្បះវប្បធម៌ នៅថ្ងៃទី២១ ខែឧសភា នាឧទ្យាន FRANKLIN SQUARE PARK 6th & RACE STREET ។




ស្របនឹងរដូវផ្ការីកមកដល់ពន្លឺ និងកំដៅថ្ងៃ ក៏នឹងមកជួបគ្នា សហគមន៍អាស៊ីមានចិនជាអ្នកដឹកមុខ នៅតំបន់ឆាយណាថោន នឹងចេញមកបង្ហាញរបាំ ចម្រៀង ល្ខោន ភ្លេង សំលៀកបំពាក់ទៅតាមវប្បធម៌របស់ជាតិសាសន៍អាស៊ីនីមួយៗ។ សាធារណជនអាចមកមើល ឬចូលមកកំសាន្តនាថ្ងៃទី២១ ខែមេសានោះ ពីម៉ោង១១ព្រឹកដល់ម៉ោង៥ល្ងាច ។

រៀងរាល់ឆ្នាំទិវានេះបានទាក់ទាញភ្ញៀវសាសន៍ជាច្រើន ពីព្រោះជាឱកាសដ៏តិចតួច ដែលក្រៅពីធ្វើកិច្ចការចិញ្ចឹមជីវិតនាថ្ងៃដទៃទៀត គេខំនាថ្ងៃទិវាអាស៊ីនាំមកនូវការយោគយល់គ្នា នូវការរៀន សូត្រពីវប្បធម៌នៃអ្នកដទៃ ៕- ***ខ្មែរប៉ុស្តិ៍-***

## តមកពីទំព័រទី 01 គ្រួសារលោក តាំង ផេង...





អ្នកស្រី ប្រោន ជាមួយបាតុករខ្មែរ

វាគ្មិនជាច្រើនមានមិត្តជិតខាងផ្ទះ មានបេក្ខជនឈរឈ្មោះជាអភិបាលក្រុងមានក្រុមឡានពន្លត់អគ្គិភ័យបានមកសំដែងការខកចិត្តចំពោះការបិទស្ថានីយសង្គ្រោះអគ្គិភ័យដោយសារអភិបាលក្រុងតំបន់ហ្វីឡាដែលហ្វៀ ហើយអំពាវនាវ"កុំឱ្យបោះឆ្នោតឱ្យនរណាដែលមិនសង្គ្រោះពលរដ្ឋខ្លួនឯងដូចជាលោក ម៉ាកិល ណាទ័រ តទៅទៀត..." នៅមុខគេហដ្ឋានលោក តាំង ផេង លេខ ១៣៤ SPARK St ដែលភ្លើងបានឆេះខ្ទេចខ្ទីអស់។

ការខ្វះខាតថវិកាដោយសារតែឱនភាពសេដ្ឋកិច្ចបានធ្វើឱ្យរដ្ឋបាលក្រុងហ្វីឡាដែលហ្វៀ ក៏ដូចជាក្រុងឯទៀតៗនៃសហរដ្ឋអាមេរិកកាត់បន្ថយសកម្មភាពទ្រទ្រង់គុណភាពសង្គមបន្ថយបុគ្គលិកការិយាល័យគ្រប់ទិសទី ក៏ប៉ុន្តែមនុស្សប្រមាណជិត១០០នាក់ដែលបានចូលរួមក្នុងបាតុកម្មមុខផ្ទះភ្លើងឆេះហើយនោះ ពុំយល់ស្របថា"ត្រូវកាត់បន្ថយសកម្មភាពសង្គ្រោះជីវិតបន្ទាន់ ដូចជាក្រុមពន្លត់អគ្គិភ័យនោះទេ"៕ -ខ្មែរប៉ុស្តិ៍-

(Continued from page 01 )

# Children of Bassac...





thoughts about the Children of Bassac, "They put their heart into preserving the culture through the sharing of the artistic and cultural history through dance. They were amazing with their movement, graceful with no mistake. They should be respected for what they do."

Steber praised Master Ieng Sithul for his extraordinary knowledge and instrumental leadership and skills leading such a well discipline and professional group of performers.

She stated, "They showed great pride and demonstrated true Khmer art. I really appreciate the program. The songs and dances, I found it very mesmerizing."

Keo reported, "The Children of Bassac made of people from a poor family. They are doing something good for themselves and for our culture. They keep our culture alive, very impressive group of people."

Sopheanee Phou-Khoeun reported the Children of Bassac Dance Troupe had performed in Japan before their US tour and that the Troupe is currently performing in Connecticut. The Children of Bassac Dance Troupe included two Dance Masters, Mr. Ieng Sithul and Mrs. Nop Thyda who lead a troupe of eleven dancers, six females and five males. They are touring and performing in the US through the month of April and May.

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ជំណឹងប្រែសម្រួលពីភាសាអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី១៣ ខែឧសភា ឆ្នាំ២០១១

# Ends in 19-Year Jail Sentence

*Tob Chan Sereivuth convicted on extortion, illegal detention charges*

BY KUCH NAREN
THE CAMBODIA DAILY

Pursat Provincial Court yesterday convicted former prosecutor Tob Chan Sereivuth of extortion and illegal detention, sentencing him to 19 years in jail in the first case brought by the country's nascent Anticorruption Unit.

Acting provincial prosecutor You Yinny said Judge Duch Chantha had ruled that Mr Chan Sereivuth's prison term began Nov 29, the day of his arrest.

Mr Chan Sereivuth and two of his bodyguards were arrested that day for a June incident in which the former prosecutor detained and attempted to extort money from a musical troupe transporting timber.

Mr Yinny said the court had also convicted the bodyguards, Ros Samnang and Chhit Vuthy, of extortion and sentenced them to 15 years and 16 years in jail, respectively. He said a third bodyguard who remained at large—Pich Kong You, Mr Chan Sereivuth's brother-in-law—was convicted of extortion and illegal detention in absentia and sentenced to 18 years.

All four were ordered to pay a total compensation of 4 million riel, or about $1,000, to the plaintiff, whose identity Mr Yinny said he could not recall.

Defense lawyer Than Borey called the decision "unacceptable."

"As one of the defense lawyers, I want to see my clients found not guilty, because the jail sentences are too much for my clients," he said. "This verdict is not acceptable and we defense lawyers will discuss with our clients whether to submit an appeal."

Mr Yinny, the acting prosecutor, welcomed the court's decision.

"From my point of view, I don't want to criticize the convict [Mr Chan Sereivuth] and his fellows, but the sentence is fair because they did commit the crimes," he said.

Chan Soveth, chief monitor for the human rights group Adhoc, said he was also pleased, if taken off guard, by the rulings.

## រឿងក្តីអង្គភាពប្រឆាំងអំពើពុករលួយដំបូងបញ្ចប់ដោយមានការជាប់ពន្ធនាគារ១៩ឆ្នាំ

ដោយ : គុច ណារ៉េន
THE CAMBODIA DAILY

កាលពីម្សិលមិញ តុលាការខេត្តពោធិ៍សាត់បានកាត់ទោសលោក តុប ច័ន្ទសេរីវុធ អតីតព្រះរាជអាជ្ញាឱ្យជាប់ពន្ធនាគាររយៈពេល១៩ឆ្នាំពីបទគំរាមទារប្រាក់និងបង្ខាំងមនុស្សខុសច្បាប់នៅក្នុងរឿងក្តីលើកដំបូងដែលធ្វើឡើងដោយអង្គភាពប្រឆាំងអំពើពុករលួយដែលទើបបង្កើតថ្មីរបស់ប្រទេសនេះ ។

លោក យូ យីនទី ជាព្រះរាជអាជ្ញារងតុលាការខេត្តបានថ្លែងថា លោកចៅក្រម ឌុច ចន្ថា បានសម្រេចថារយៈពេលជាប់ពន្ធនាគាររបស់ តុប ច័ន្ទសីរីវុធ បានចាប់ផ្តើមកាលពីថ្ងៃទី២៩ វិច្ឆិកា ជាថ្ងៃដែលចាប់រូបលោក។

លោក តុប ច័ន្ទសីរីវុធ និងអង្គរក្សរបស់លោក ២នាក់ទៀត ត្រូវបានចាប់ខ្លួននៅថ្ងៃនេះ ចំពោះហេតុការណ៍មួយកាលពីខែមិថុនា ដែលនៅក្នុងនោះ អតីតព្រះរាជអាជ្ញារូបនេះបានឃុំខ្លួន ហើយបានប៉ុនប៉ងគំរាមទារប្រាក់ពីក្រុមមន្ត្រីមួយដែលដឹកឈើ ។

លោក យូ យីនទី បានថ្លែងថា តុលាការក៏បានកាត់ទោសអង្គរក្សទាំងពីរឈ្មោះ រស់ សំណាង និង ឈិត វុទ្ធី ពីបទគំរាមទារប្រាក់ផងដែរ ហើយបានកាត់ទោសលោក រស់ សំណាង ឱ្យជាប់ពន្ធនាគាររយៈពេល១៥ឆ្នាំនិងលោក ឈិត វុទ្ធី ឱ្យជាប់ពន្ធនាគាររយៈពេល១៦ឆ្នាំ។

លោកបានមានប្រសាសន៍ថា អង្គរក្សទីពាំដែលកំពុងរត់គេចខ្លួននៅឡើយឈ្មោះ ពេជ្រ គង់យូ ដែលត្រូវជាកូនប្រសាប្រុសលោក តុប ច័ន្ទសីរីវុទ្ធនោះ ត្រូវបានកាត់ទោសកំបាំងមុខឱ្យជាប់ពន្ធនាគាររយៈពេល១៨ឆ្នាំពីបទគំរាមទារប្រាក់និងបង្ខាំងមនុស្ស ខុសច្បាប់ ។

អ្នកទាំង៤ត្រូវបានបង្គាប់ឱ្យបង់សំណងសរុប៤លានរៀល( ប្រហែល ១.000ដុល្លារ)ទៅឱ្យដើម ចោទដែលលោក យូ យីនទី បានថ្លែង លោកមិនចាំឈ្មោះដើមចោទរូបនោះទេ លោក ថន បុរី ជាមេធាវីការពារក្តីបានហៅសេចក្តីសម្រេចនេះថា "មិនអាចទទួលយកបាន"។ លោកបានថ្លែងថា "ក្នុងនាមជាមេធាវីការពារក្តីម្នាក់ខ្ញុំចង់ឃើញកូនក្តីរបស់ខ្ញុំមិនត្រូវបានរកឃើញពិរុទ្ធភាពទេ ព្រោះរយៈពេលជាប់ពន្ធនាគារគឺច្រើនណាស់ សម្រាប់កូនក្តីរបស់ខ្ញុំ។សាលក្រមនេះមិនអាចទទួលយកបានទេ ហើយយើងជាមេធាវីការពារក្តីនឹងពិភាក្សាជាមួយកូនក្តីរបស់យើងថា តើត្រូវប្តឹងឧទ្ធរណ៍ឬយ៉ាង ណា"។

លោក យូ យីនទី ជាព្រះរាជអាជ្ញារងបានស្វាគមន៍សេចក្តីសម្រេចរបស់តុលាការ។ លោកបានបន្តថា"តាមគំនិតខ្ញុំ ខ្ញុំមិនចង់រិះគន់ (បណ្ឌិត តុប ច័ន្ទ សីរីវុទ្ធ) និងគូកនរបស់គាត់នោះទេ ប៉ុន្តែការកាត់ក្តីនេះវាយុត្តិធម៌ហើយ ពីព្រោះពួកគេបានប្រព្រឹត្តិបទឧក្រិដ្ឋទាំងនេះមែន"។

លោក ចាន់ សុវេត ជាអ្នកឃ្លាំមើលជាន់ខ្ពស់នៅអង្គការសិទ្ធិមនុស្សអាដហុកបានមានប្រសាសន៍ថាលោកមានការសប្បាយចិត្តនិងការភ្ញាក់ផ្អើលផងដែរ ចំពោះការសម្រេចចិត្តនេះ។

លោកបានមានប្រសាសន៍ថា "ការប្រកាសសាលក្រុមនៅថ្ងៃនេះគឺ ពិតជាមានការភ្ញាក់ផ្អើល ពីព្រោះយើងមិនដែលរំពឹងថា"អ្នកដែលមានអំណាចបែបនេះក្នុងប្រព័ន្ធតុលាការបានកាត់ទោសឱ្យជាប់ពន្ធនាគាររយៈពេល១៩ឆ្នាំនោះទេ "។

ប៉ុន្តែក៏លោកមានចម្ងល់ដោយសារហេតុពិត ដែលថាតុលាការមិនបានអនុវត្តតាមការចោទពីបទពុករលួចដែលលោក តុប ច័ន្ទសីរីវុទ្ធ ត្រូវបានចាប់ខ្លួនដោយការចោទប្រកាន់នេះផងដែរ ជាការចោទប្រកាន់ដែលមិនត្រូវបានបរិយាយលម្អិត។

លោកបានមានប្រសាសន៍ថា "យើងគាំទ្រ ហើយសរសើរតុលាការ និងក្រុមមន្ត្រីចំពោះការ ប្តេជ្ញារបស់ខ្លួនក្នុងលប់បំបាត់ការគំរាមទារប្រាក់ និងអំពើពុករលួយ ប៉ុន្តែយើងមានចម្ងល់ថា ហេតុអ្វីបានជាលោកមិនបាន ប្រឈមមុខនឹងការចោទប្រកាន់ពីបទពុករលួយ ។ ប្រហែលជាតុលាការនឹងលើកឡើងការចោទប្រកាន់ទាំងនោះក្នុងករណីផ្សេងហើយ"។

កាលពីខែកុម្ភៈ ឆ្នាំ២00៩ លោក តុប ច័ន្ទសីរី វុទ្ធ បានជាប់ពាក់ព័ន្ធនៅក្នុងជម្លោះដីធ្លីមួយដែលត្រូវផ្ទេរពីខេត្តបន្ទាយមានជ័យដោយសម្ងាត់ទៅក្នុងតុលាការរបស់លោកជាទីដែលលោកធ្លាប់ធ្វើចៅក្រមម្នាក់។

មុនពេលចាប់ខ្លួនលោកកាលពីខែវិច្ឆិកា លោក តុប ច័ន្ទសីរីវុទ្ធ គឺជាកម្មវត្ថុនៃពាក្យបណ្តឹងដែលចោទប្រកាន់ថា លោកបានទាមទារប្រាក់ពីបុរសម្នាក់ដែលជាប់ចោទពីបទមនុស្សឃាត ដើម្បីស្វែងរកការដកការចោទប្រកាន់ដោយតុលាការមួយទៀត ។

លោក យូ យីនទី បានមានប្រសាសន៍ថា លោក មិនដឹងថា តើលោក តុប ច័ន្ទសីរីវុទ្ធ នឹងប្រឈមការ ចោទប្រកាន់បន្ថែមទៀត នៅពេលអនាគតឬយ៉ាង ណានោះទេ ។

លោក ឱម យ៉ិមទៀង ជាប្រធានអង្គភាពប្រឆាំង អំពើពុករលួយ និង លោក កែវ រ៉េមី បានបដិសេធ មិនធ្វើអត្ថាធិប្បាយទេ៕

# Pig Shortage Drives Phnom Penh Pork Prices Up

BY HUL REAKSMEY AND PHILIP HEIJMANS
THE CAMBODIA DAILY

Increased production costs and a shortage in local supply caused by last year's blue-ear outbreak has sent the retail price of pork in Phnom Penh up 42.8 percent on the year to about 20,000 riel, or $5 per kg, industry officials and suppliers said on Wednesday.

San Chanthet, president of the Association of Cambodian Pig Supply, himself a butcher, said that at the end of 2010, live pigs traded at 9,000 riel per kg and rose to 13,200 riel this month because of domestic undersupply.

"Pig distributors raise the price because they have to manage the fact we have low local supply," he said.

Other experts say that the price hike comes from last year's blue-ear outbreak, which eliminated nearly all of Cambodia and Vietnam's pig supply.

"Although it is difficult to say exactly how much, the disease nearly wiped out the whole supply," said Prathna Preap, Swine Market Development Expert of the USAID-funded MSME Project.

"Now that the price is good, farmers are starting to raise more pigs."

An increase in production costs has also contributed to higher prices, while a high petrol price at the pumps is making importing pig more costly.

"The price for the primary feed ingredient, corn, has nearly doubled, and with increasing transportation, these are all good things for the Cambodian pig raiser, feed processor and trader, since imported swine costs more to bring to Phnom Penh," said Curtis Hundley, chief of party at the MSME Project. "They become more competitive because of less transportation costs and most of the animal feed ingredients are available locally."

Phnom Penh only locally produces about 10 percent of its daily pork consumption of about 2,000 pigs, while the rest is imported from neighboring countries and rural domestic farmers, Mr Chanthet said.

Agribusiness tycoon and owner of two pig farms in Preah Sihanouk province, Mong Reththy, said his farms did not have enough to supply outside the province and that other farmers needed to be more aware of the changing marketplace.

"I told people for a long time they have to produce pigs, but they just kept money in the bank," he said. "We can't just raise one or two pigs, it's not enough."

## ការផ្គត់ផ្គង់មិនគ្រប់គ្រាន់ធ្វើឱ្យតម្លៃសាច់ជ្រូកកើនឡើងជិតពាក់កណ្តាល

ដោយ : ហ៊ុល រស្មី និង PHILIP HEIJMANS
THE CAMBODIA DAILY

ក្រុមមន្ត្រីឧស្សាហកម្មចិញ្ចឹមជ្រូក និងអ្នកផ្គត់ផ្គង់ជ្រូកបាននិយាយកាលពីម្សិលមិញថា ការចំណាយខ្ពស់ក្នុងការចិញ្ចឹម និងកង្វះនៅក្នុងការផ្គត់ផ្គង់ជ្រូកក្នុងស្រុកដែលបង្កឡើងដោយសារកើតជំងឺត្រចៀកខៀវ កាលពីឆ្នាំមុននោះ បានធ្វើឱ្យតម្លៃសាច់ជ្រូកលក់រាយនៅក្នុងទីក្រុងភ្នំពេញ កើនឡើង៤២.៨ភាគរយនៅឆ្នាំនេះមកដល់ប្រហែល២០.000រៀល។



Philip Heijmans/The Cambodia Daily
A vendor weighs pork for a customer in Prampi Makara district's O'Russei market in Phnom Penh on Wednesday. Pork prices in the city this year have spiked 42.8 percent due to regional supply shortages.

លោក ថន ចាន់ថេត ជាប្រធានសមាគមផ្គត់ផ្គង់សាច់ជ្រូកកម្ពុជា ដែលខ្លួនគាត់ផ្ទាល់ជាអ្នកលក់សាច់ជ្រូកដែរនោះ បាននិយាយថា នៅចុងឆ្នាំ២០១០ ជ្រូករស់លក់ក្នុងតម្លៃ៩.000រៀលក្នុង១គីឡូក្រាម ហើយបានកើនដល់១៣.២00រៀលនៅខែនេះ ដោយសារការផ្គត់ផ្គង់ក្នុងស្រុកមិនគ្រប់ គ្រាន់។

លោកបាននិយាយថា "អ្នកចែកចាយសាច់ជ្រូកដំឡើងតម្លៃពីព្រោះពួកគេត្រូវគ្រប់គ្រងហេតុការណ៍ដែលថា យើងមានការផ្គត់ផ្គង់ក្នុងស្រុកទាប"។

ក្រុមអ្នកជំនាញផ្សេងទៀតនិយាយថា ការកើនឡើងតម្លៃនេះដោយសារការផ្ទុះឡើងជំងឺត្រចៀកខៀវ កាលពីឆ្នាំមុន ដែលធ្វើឱ្យបាត់បង់ស្ទើរទាំងអស់នៃការផ្គត់ផ្គង់ជ្រូកនៅកម្ពុជា និងពីវៀតណាម។

កំណើនចំណាយក្នុងការចិញ្ចឹមក៏បានរួមចំណែកដល់តម្លៃកាន់តែខ្ពស់នេះដែរ រីឯតម្លៃប្រេងខ្ពស់ក៏ធ្វើឱ្យជ្រូកនាំចូលកាន់តែមានតម្លៃខ្ពស់ផងដែរ។

លោក ឃើធីស ហ៊ុនលី ជាប្រធានគម្រោង MSME បាននិយាយថា "តម្លៃគ្រឿងផ្សំចំណីសំខាន់ៗដូចជាពោតជាដើមបានកើនឡើងជិតពីរដង ហើយដោយសារតម្លៃដឹកជញ្ជូនកើនឡើងទាំងនេះគឺជារឿងល្អសម្រាប់អ្នកចិញ្ចឹមជ្រូកកម្ពុជា អ្នកផលិតចំណីជ្រូក និងឈ្មួញ ដោយសារជ្រូកនាំចូលត្រូវចំណាយកាន់តែច្រើនក្នុងការដឹកមកទីក្រុងភ្នំពេញ ។ ពួកគេមានការប្រកួតប្រជែងកាន់តែខ្លាំងដោយសារតម្លៃដឹកជញ្ជូនតិចជាង ហើយគ្រឿងផ្សំចំណីសត្វភាគច្រើនអាចរកបាននៅក្នុងស្រុក"។

លោក ចាន់ ថេត បាននិយាយថា ទីក្រុងភ្នំពេញផលិតជ្រូកក្នុងស្រុកបានប្រហែល១០ភាគរយប៉ុណ្ណោះក្នុងចំណោមតម្រូវការសាច់ជ្រូកប្រចាំថ្ងៃរបស់ខ្លួនប្រហែល២.000ក្បាល រីឯតម្រូវការដែលនៅសេសសល់ត្រូវបាននាំចូលពីប្រទេសជិតខាង និងកសិករក្នុងស្រុកនៅតាមតំបន់ជនបទ។

លោក ម៉ុង ឫទ្ធី ជាសេដ្ឋីកសិឧស្សាហកម្ម និងជាម្ចាស់កសិដ្ឋានចិញ្ចឹមជ្រូកដ៏ធំចំនួនពីរនៅក្នុងខេត្តព្រះសីហនុបាននិយាយថា កសិដ្ឋានរបស់លោកមិនមានជ្រូកគ្រប់គ្រាន់ ដើម្បីផ្គត់ផ្គង់នៅក្រៅខេត្តនេះទេ ហើយថាអ្នកចិញ្ចឹមជ្រូកផ្សេងទៀត ត្រូវតែយល់ឱ្យបានច្បាស់អំពីទីផ្សារដែលផ្លាស់ប្តូរនេះ។

លោកបាននិយាយថា "ខ្ញុំបានប្រាប់ប្រជាជនជា យូរមកហើយថា ពួកគេត្រូវតែចិញ្ចឹមជ្រូក ប៉ុន្តែពួកគេទុកតែក្នុងធនាគារ ។ យើងមិនអាចចិញ្ចឹមតែជ្រូក១ក្បាលឬពីរក្បាលនោះបានទេ វាមិនអាចគ្រប់ គ្រាន់ឡើយ"៕




# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ប្រែសម្រួលដោយ : ពិន សំខុន (តពីលេខមុន)**

•**២០ វិច្ឆិកា** : ក្រុមរដ្ឋាភិបាលចម្រុះ GCDK បានត្រៀមបើកការវាយប្រយុទ្ធមួយចាប់ពីផ្លូវជាតិលេខ៥ រហូតស្រុកសំរោង ភាគខាងជើងប្រទេស ។

•**២២ វិច្ឆិកា** : ភាគីខ្មែរក្រហម បានជម្រុញជនស៊ីវិលប្រមាណ២០០០នាក់ជាចំណាប់ខ្មាំង ឱ្យទៅរស់នៅភ្នំឆ័ត្រ ។ រីឯភាគី រជរបខ ( KPNLF - SONG SANN) បានវាយយកស្រុកស្វាយចេកមកវិញ ។

•**២២ វិច្ឆិកា** : ថ្ងៃដដែលនោះ មានការចុះហត្ថលេខាទទួលជំនួយពីកាកបាតក្រហមស៊ុយអ៊ែត និងកាកបាតក្រហមកម្ពុជា ( Etat du Cambodge).

•**២៣ វិច្ឆិកា** : ជាលើកទី១ហើយ អង្គភាព អ.ស.ប សម្រាប់អភិវឌ្ឍន៍ (P.N.U.D) បានបង្ហាញឱ្យឃើញថា មានស្ថានភាពទ្រុឌទ្រោមជាខ្លាំងបំផុតក្នុងសង្គមរដ្ឋកម្ពុជា ដែលរស់នៅជាឯកោ ។

•**២៤ វិច្ឆិកា** : លោក ហ្គារីត អ៊ីវ៉ាន់ ( GARRET EVANS) រដ្ឋមន្ត្រីការបរទេសអូស្ត្រាលី បានស្នើពីគម្រោងស្តីពីសន្តិសុខនៅកម្ពុជា ដោយដាក់ឱ្យនៅក្រោមការគ្រប់គ្រងរបស់ អ.ស.ប ។

•**២៧ វិច្ឆិកា** : ស្តេចសីហនុ ពុំបានទទួលស្គាល់គម្រោងសន្តិសុខអូស្ត្រាលីនេះទាំងស្រុងទេ ។

•**៣ ធ្នូ** : នៅប៉ារីស មានការបង្កើតសមាគមខ្មែរសេរី (Union der khmer Libres) ដែលមានមនសិការនយោបាយផ្សេងទៅសង្គមសាធារណរដ្ឋមួយ ពុំស្របតាមរដ្ឋកម្ពុជាឡើយ ។

•**៧ ធ្នូ** : សហរដ្ឋអាមេរិកធ្វើការផ្តន្ទាទោសលើចក្រភពអង់គ្លេស ដែលបានបញ្ជូនរាជទូតខ្លួនឱ្យចូលទៅភ្នំពេញ ។ ទស្សនៈកិច្ចនេះមានបំណងត្រួតពិនិត្យលើតុល្យភាពនៃស្ថានភាពជំនួយមនុស្សធម៌អង់គ្លេសនៅកម្ពុជា ។

•**១០ ធ្នូ** : ហ៊ុន សែន បញ្ជាក់ថា ត្រៀមចាំទទួលចរចារពិភាក្សាលើសំណើរសន្តិភាពដោយប្រទេសអូស្ត្រាលី ។

•**១៤ ធ្នូ** : ភាគី រ.ជ.រ.ប.ខ (KPNLF) ស្វែងរកការដោះដូរថ្មជាប្រាក់ ដើម្បីអនុញ្ញាត្តិ និងទទួលយកបាននូវក្រុមព័ត៌មានឱ្យចូលថតព័ត៌មានក្នុងតំបន់ប្រយុទ្ធរបស់គេ ។

•**១៥ ធ្នូ** : ដំណោះស្រាយលើគម្រោងការសន្តិភាពរបស់អូស្ត្រាលី ត្រូវទទួលបានជោគជ័យ ហើយទទួលឈ្មោះថា ជាគម្រោងបែបនីមីពប៊ី (NIMIBIENNE) ។

•**៣០ ធ្នូ** : លោក អាលី អាឡាតាស (ALI ALATAS) នៃអគ្គលេខាធិការដ្ឋាន អ.ស.ប បានប្រកាសយកខែកុម្ភៈ ១៩៩០ ដើម្បីបើកិច្ចពិភាក្សាលើសំណើរគម្រោងសន្តិភាពអូស្ត្រាលីនេះ ។

**<u>ឆ្នាំ ១៩៩០</u>**

•**៣ មករា** : លោក កាស់ស្តែឡូ (នៃក្រសួងការបរទេសអូស្ត្រាលី) បង្ហាញ និងពន្យល់គម្រោងសន្តិភាពនៅទីក្រុងបាងកក ចំពោះមុខថ្នាក់ដឹកនាំ GCKD(រដ្ឋាភិបាលចំរុះកម្ពុជាប្រជាធិបតេយ្យ) ។

•**៧-៨ មករា** : ជំនួបរវាង កាស់ស្តែឡូ និង ហ៊ុន សែន ។ ភាគីខ្មែរក្រហមវាយសង្គ្រប់មកលើខេត្តបាត់ដំបង ។

•**១១ មករា** : លោកប្រធានាធិបតីបារាំង ហ្វ្រង់ស្វ័រមីតតេរ៉ង់ និយាយថា "ពុំអាចមានការព្រមព្រៀងណាមួយទេ ជាមួយពួកខ្មែរក្រហម" ។ នៅភ្នំពេញឯណោះវិញ មានការចាប់ស៊ីវិល និងប្រជាពលរដ្ឋចូលក្នុងជួរទ័ពរដ្ឋកម្ពុជា ។

•**១៥-១៧ មករា** : ប្រទេសទាំងប្រាំនៃរដ្ឋបាលអចិន្ត្រៃយ៍របស់ អ.ស.ប បានជួបប្រជុំពិភាក្សាលើគម្រោងសន្តិភាព ស្នើដោយអូស្ត្រាលី ។ ឯកសារមួយដែលមាន ១៦ចំណុច ត្រូវបានកត់ត្រាទុកសម្រាប់ជជែក និងវិភាគក្នុងការប្រជុំដែលបានគ្រោងទុកនៅក្រុងប៉ារីស ។

•**១៧ មករា** : សម្តេចសីហនុ បានថ្លែងការណ៍ថា "នឹងមិនចូលរួមពិភាក្សាអ្វីទៀតទេ ជាមួយភាគីខ្មែរ ហើយបានសង្កត់ថា "ឧត្តមប្រឹក្សាសន្តិភាព (C.N.S) គឺបានកើតពីគំនិតរបស់ ហ៊ុន សែន និងវៀតណាម ។ ទ្រង់នឹងពុំមានវត្តមានជាមួយឡើយ ។

•**២១ មករា** : ពលរដ្ឋដែលរស់នៅក្រោមការត្រួតត្រានៃខ្មែរក្រហមចំនួន៣ម៉ឺននាក់ ត្រូវបានដាក់ជញ្ជូនដោយបង្ខំ ឱ្យត្រឡប់ចូលក្នុងប្រទេសរបស់ខ្លួនវិញ ។

•**២៤ មករា** : ស្តេចសីហនុ ធ្វើការរអ៊ូរទាំថា ទ្រង់បានទទួលរងការវាយប្រហារជាទូទៅក្នុងបរិបទនយោបាយជាតិ បានលាលែងចេញពីក្បាលម៉ាស៊ីននៃរដ្ឋាភិបាលចំរុះត្រីភាគី (G.C.K.D) ។

•**២៦ មករា** : លោក ខៀវ កាញារិទ្ធ សមាជិកនៃរបបរដ្ឋកម្ពុជា និងជាអ្នកព័ត៌មានដែលល្បីថា ជាបុគ្គលឯករាជ្យក្នុងវិជ្ជាជីវៈកាសែត បានសាកល្បងដោយពុំបានទទួលនូវជោគជ័យក្នុងការសុំលប់ចោលនូវមាត្រា៣ និង៤នៃរដ្ឋធម្មនុញ្ញថ្មី (រដ្ឋកម្ពុជា) ដែលទំនាក់ទំនងទៅនឹងតួនាទីគ្រប់គ្រងនៃថ្នាក់ដឹកនាំកំពូល (នៃរបបកម្ពុជាប្រជាមានិត PRPK) ។

•**៣ កុម្ភៈ** : ស្តេចសីហនុ បានទទួលការព្រមព្រៀងពីភាគីខ្មែរក្រហម ដែលប្តូរឈ្មោះត្រីភាគីចម្រុះឱ្យទៅជារដ្ឋាភិបាលជាតិនៃកម្ពុជា (G.N.C) government National du Cambodge ហើយដែលមានស្តេចអង្គនេះជាប្រមុខរដ្ឋ ហើយដែលមានទង់ជាតិ និងចំរៀងជាតិ ដែលមានកាលពីមុនឆ្នាំ១៩៧០ ។ ហើយម្យ៉ាងទៀត អនាគតនៃរបបថ្មីនេះ ត្រូវមានលំអានតាមបែបរបបប្រជាធិបតេយ្យ តាមបែបរបបសាធារណរដ្ឋជំនាន់ទី៥ នៃប្រទេសបារាំង ។ សូមរំលឹកថា ប្រទេសកម្ពុជាត្រូវបានតំណាងដោយរបប ប៉ុល ពត តាំងពីឆ្នាំ១៩៧៩ មកដល់សព្វថ្ងៃ នៅក្នុងរាល់រចនាសម្ព័ន្ធទាំងឡាយនៃ អ.ស.ប ។

•**៦ កុម្ភៈ** : មានការកាប់សម្លាប់គ្នានៅខេត្តកោះកុង ដែលធ្វើឱ្យស្លាប់ខ្មែរក្រហមអស់ចំនួន២៥០នាក់ ។

•**៥ កុម្ភៈ** : កងកម្លាំងអន្តរាគមន៍ពិសេសជាតិយួនដែលបង្កើតឡើងដោយយោងតាមគំនិតរបស់ ហ៊ុន សែន ត្រូវបានគេសង្កេតថា បានធ្វើសកម្មភាពតាមរាល់សំណើរ នៅលើទឹកដីកម្ពុជា ។ កងកម្លាំងនេះធ្វើសកម្មភាពក្នុងខេត្តបាត់ដំបង ជាកន្លែងដែលមានសកម្មភាពសឹកនៅពុំទាន់អស់ តាំងពីដើមខែមករាមកម្ល៉េះ ។ **(នៅមានតលេខក្រោយទៀត)**




# ពុទ្ធប្បវត្តិអមដោយរូបភាព

# A Pictorrial Biography of Saky amuni Buddha

❖ រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា
❖ បកប្រែជាភាសាអង់គ្លេស ដោយ ហ្សិត .អេ.លី
❖ ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី
❖ បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ

❖ Original Illuatration and Naration in Thai by Gunapayuta.
❖ Translation into English by A Lu.
❖ Coloring by Yann Fang Lee
❖ Translation into Khmer by Bhikkhu Kong Am.

**១២៣-** ជាច្រើនថ្ងៃក្រោយមក នៅពេលដែលព្រះពុទ្ធបរមគ្រូជាម្ចាស់កំពុងគង់សំរាកនៅក្រោមដើម **ភៃស** (ដើម Pipala) មាននាយពាណិជ្ជពីរនាក់បានធ្វើដំណើរកាត់តាមនោះ ពួកគេបានជួបនឹងព្រះពុទ្ធកំពុងយ៉ាងធម្មតាដោយស្ងៀមស្ងាត់ និងដោយសប្បាយរីករាយបីដូចជាមនុស្សដែលបានទទួលជោគជ័យក្នុងសង្គ្រាមក្តៅដ៏ធំបំផុត ហើយបានសប្បាយរីករាយក្នុងជ័យជំនះរបស់ខ្លួន ។ ឃើញដូច្នេះ នាយពាណិជ្ជទាំងពីរក៏បន្ទន់កាយថ្វាយភោជនាហារដ៏មានរស់ឆ្ងាញ់ពិសារ ដែលបានដាក់តាមខ្លួនប្រគេនដល់ព្រះពុទ្ធជាម្ចាស់ដោយសេចក្តីគោរព និងចាប់អារម្មណ៍យ៉ាងខ្លាំងដោយបានឃើញព្រះអាការៈ និងបានស្តាប់ព្រះពុទ្ធដីការបស់ព្រះអង្គពួកជនទាំងពីរនាក់ក៏បានក្រាបថ្វាយបង្គំទូលសុំព្រះពុទ្ធជាម្ចាស់ទ្រង់មេត្តាទទួលខ្លួនធ្វើជាសាវ័ក នាយទាំងពីរនេះគឺឈ្មោះ **តបុស្សៈ** និង **ភល្លិកៈ** ។ ដោយហេតុជនទាំងពីរនាក់បានចូលជ្រកកោនជាទីពឹងក្នុងព្រះពុទ្ធ គេក៏បានជាសាវ័កមុនគេបង្អស់របស់ព្រះពុទ្ធបរមគ្រូជាម្ចាស់ ។

**១២៤-** ក្រោយពីគង់អស់រយៈពេលយូរបន្តិចមក ព្រះពុទ្ធអង្គទ្រង់រំពឹងពិចារណានូវអ្វីដែលព្រះអង្គគួរនឹងធ្វើសំរាប់ពេលខាងមុខ ។ ជាដំបូងព្រះអង្គទ្រង់ព្រះតំរិះថា : "ធម៌ដែលតថាគតបានសំរេចចេះដឹងទាំងប៉ុន្មាន មានគម្ពីរជ្រាលជ្រៅណាស់ ជាធម៌ដែលមនុស្សមហាករុណាដ៏ធំ និងបញ្ញាដ៏លើសលប់ពេលនោះព្រះអង្គរំពឹងពិចារណាថា : "មនុស្សសត្វពួកខ្លះមានរាគៈតណ្ហាស្តើង និងមានទោសៈតិចមនុស្សសត្វពួកខ្លះទៀតមានកិលេសតណ្ហាតិចតួចស្តួចស្តើងបំផុត ។ មនុស្សទាំងឡាយនោះអាចនឹងទទួលយកព្រះធម៌នេះបានច្រើនប្រៀបដូចផ្កាឈូក ដែលដុះលូតលាស់ផុតចេញពីទឹកស្រះរង់ចាំទទួលពន្លឺរស្មីនៃព្រះអាទិត្យដើម្បីនឹងរីកដូច្នេះដែរ ។ ព្រោះហេតុដូច្នេះតថាគតមិនគួរលាក់បាំងទុកនូវសច្ចធម៌ដ៏អស្ចារ្យនេះទេ តថាគតត្រូវតែចែករំលែកផ្សព្វផ្សាយព្រះធម៌អស្ចារ្យនេះឱ្យមនុស្សសត្វទាំងឡាយបានដឹងគ្រប់ទីទាំងអស់ដើម្បីឱ្យជនទាំងឡាយនោះ បានទទួលផលប្រយោជន៍ពីព្រះធម៌នេះស្មើៗគ្នា" ។ ដូច្នេះព្រះអង្គក៏ទ្រង់សំរេចព្រះទ័យផ្សព្វផ្សាយព្រះធម៌ប្រោសដល់សត្វលោក ។

**១២៥-** ក្រោយពីបានសម្រេចព្រះទ័យដូច្នេះ ហើយព្រះសម្មាសម្ពុទ្ធទ្រង់រំពឹងថា :"តើនរណាដែលត្រូវបានតថាគតត្រូវប្រោសមុនគេ? ជននោះដែលពិតជាអ្នកមានចិត្តទោរទន់ទៅរកប្រៀនប្រដៅធម៌ ហើយពិតជានឹងបានយល់ជ្រួតជ្រាបព្រះធម៌ដោយរហ័ស" ។ ព្រះបរមសាស្ត្រាចារ្យជាម្ចាស់ មុនដំបូងទ្រង់រំពឹងគិតដល់គ្រូអារទកាលាមៈ ដែលជាអ្នកមានប្រាជ្ញាយល់ដឹងនូវហេតុផល និងមានរាគតណ្ហាស្តើងបំផុត ។ គាត់ជាមនុស្សដែលទទួលយកបាននូវព្រះធម៌ដោយពិតប្រាកដ ។ ប៉ុន្តែភ្លាមនោះ ព្រះអង្គទ្រង់ប្រមើលមើលទៅឃើញថា អារទកាលាមៈតាបសបានសុគតបាត់ទៅហើយ ។ បន្ទាប់មកព្រះអង្គទ្រង់បានពិចារណាគិតដល់គ្រូផ្សេងទៀតគឺ ឧទកៈតាបសប៉ុន្តែរំពេចនោះទ្រង់បានជ្រាបច្បាស់ថា តាបសនោះក៏សុគតបានទៅហើយដែរ ។ ជាចុង ក្រោយទ្រង់គិតដល់ពួមសមណៈទាំង៥អង្គដែលបានតាមបំរើព្រះអង្គតាំងតែពីមុនព្រះអង្គធ្វើទុក្ករកិរិយានៅឧរុវេលាប្រទេស នៅពេលនោះតែម្តង ដើម្បីស្វែងរកពួកភិក្ខុទាំងឡាយនោះ ។

**(នៅមានតលេខក្រោយទៀត)**



123- Many days later, while the Buddha was resting under a pipala tree, two merchants passed by. They found the Buddha sitting extraordinarily calmly and joyously like somebody who had won the biggest battle, pleased with his victory. So they reverently offered the Buddha the exquisite food they had brought with them and being deeply impressed by the Buddha's appearance and speech, they requested that the Buddha accept them as disciples. The names of the two merchants were Tapussa and Bhallika. Because both of Buddha, they became the Buddha's first two disciples.



124- After a long rest, the Buddha began to plan what he should do for the future. At first he thought: "The Dharma I have comprehended is difficult and profound, and it can hardly be accepted by most people, whose desire-nature is very strong." But with great compassion and unsurpassed wisdom, the Buddha then concluded: "Some people have light passion and few vexations; some people have fairly little desire. Such people may be able to accept this Dharma mush as the lotus extends its stalk from the bottom of the pond op into the air to receive sunshine. I, therefore, should not hold secret the radiant truth, but shall make it known everywhere so that all people can benefit decided to propagate the dharma.



125- After making up his mind thus, the Buddha began to ponder: "Whom shall I convert first? This person must be inclined to the teaching of Dharma and must be quick in understanding it". First, he thought of his own master Aradakalama, who was a wise man of reason and had very light passion. He was definitely the person to accept the dharma. But he soon learned that Aradakalama had passed away. He then thought of his other master, Udrakaramaputra, but soon found out that he had also died. Finally, the five Sramanas who had followed him before in the practice of asceticism at Uruvilva came round to the Buddha's consciousness. When he learned that they were now at Mrgadava, near Varanasi (Benares), he left Unuvilva at once in order to look for them.

*(Continued to Issue)*

# ប្រវត្តិរណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែរ រ.ជ.រ.ប.ខ លោកតា សឺន សាន




ដោយ : ម៉ម យ៉ឹន

•••ចំណែកការបាត់ខ្លួនតំណាងរាស្ត្រខេត្តកំពង់ចាមពីររូប មានឈ្មោះលោក ហ៊ូ យន់ និងលោក ហូ នឹម ព្រមគ្នានឹងការបាត់ខ្លួនម្ចាស់សារព័តិមានជាភាសាបារាំងឈ្មោះ Observateur (អ្នកសង្កេតការណ៍) នោះធ្វើឱ្យប្រភពព័តិមានផ្សាយចេញពីប្រទេសកុម្មុយនីស្ត បានឱ្យដឹងថា ជនទាំង៣រូបសំខាន់នេះបានត្រូវគេចាប់យកទៅនៅពេលយប់មួយ ហើយបានសម្លាប់ចោលដោយសម្ងាត់បំបាត់តាងបាត់អស់ទៅហើយ សូម្បីតែឆ្អឹងសពក៏ពុំបានសល់ដែរ ហើយគេបានបញ្ជាក់ថា គេដឹងទីកន្លែងសម្លាប់នោះទៀតផង។ ប៉ុន្តែព័តិមាននេះពុំបានធ្វើឱ្យមតិមន្ត្រីខ្មែរចាត់ទុកថាជាការពិតបានឡើយ ។

ចំណែកប្រមុខរដ្ឋខ្មែរ បានចេញព្រះរាជសារមួយប្រកាសប្រាប់ប្រជាពលរដ្ឋខ្មែរថា ការបាយខ្លួនតំណាងរាស្ត្រ២នាក់ និងម្ចាស់សារព័តិមានម្នាក់ ឈ្មោះ ខៀវ សំផន នេះ គឺជាការរត់ចេញទៅបាត់ដោយខ្លួនឯងទេ គ្មានអាជ្ញាធរ យោធា ឬស៊ីវិលណា បានចាប់យកទៅសម្លាប់ទេ ត្រូវឱ្យប្រជាពលរដ្ឋទាំងអស់ កុំបីមានការរំជើបរំជួលច្រួលច្របល់ក្នុងរឿងនេះឡើយ ត្រូវតែស្ថិតនៅឱ្យស្ងៀម រក្សារបៀបរៀបរយ ទុកឱកាសឱ្យរដ្ឋាភិបាលស៊ើបអង្កេតរកឱ្យឃើញរឿងពិតនៅក្នុងករណីបាត់ខ្លួនសហជីវិនទាំង៣រូបនេះ ។

ទោះបីជាមានព្រះរាជសារខាងលើនេះក៏ដោយ ក៏ការរំជើបរំជួលនៅតែមាន ធ្វើឱ្យប្រជាពលរដ្ឋមានសេចក្តីព្រួយបារម្ភ និងអស់សង្ឃឹមមួយថ្ងៃបន្តិចៗ ដោយឃើញមានអសន្តិសុខចាប់ផ្តើមកើតឡើងបន្តិចម្តងៗដែរ ។

ស្របពេលជាមួយនៅក្នុងឆ្នាំ១៩៦១ សង្គ្រាមប្រយុទ្ធគ្នានៅក្នុងប្រទេសយួនខាងត្បូង ក៏បានឆេះឆាបរាលដាលកាន់តែខ្លាំងឡើងៗ ដោយសារតែមេដឹកនាំប្រទេសយួនខាងជើង ដែលបានរបបកុម្មុយនីស្ត បានសម្រេចចិត្តវាយប្រយុទ្ធដេញកំចាត់អ្នកកាន់អំណាចយួនខាងត្បូង ដែលរបកាន់របបលោកសេរី ឱ្យខ្ចាត់ចេញពីអំណាច ហើយបង្រួបបង្រួមឱ្យទៅជាប្រទេសយួនកុម្មុយនីស្តតែមួយ ។

សូមបញ្ជាក់ថា នៅពេលសន្និសីទក្រុងហ្សឺណែវ ប្រទេសស្វីស បានសម្រេចបែងចែកប្រទេសយួនជា២ចំណែក គឺប្រទេសយួនខាងជើង ដឹកនាំដោយមេកុម្មុយនីស្ត និងខាងត្បូងដឹកនាំដោយមេលោកសេរី ម្យ៉ាងទៀតបើតាមប្រវត្តិសាស្ត្រខ្មែរចែងថា ប្រទេសយួនខាងត្បូងនេះ គឺជាដែនដីរបស់ប្រទេសខ្មែរទេ នៅមុនឆ្នាំ១៩៤៩ គឺជាឆ្នាំដែលប្រទេសបារាំង បានប្រគល់ទឹកដីខ្មែរកម្ពុជាក្រោមនេះ ទៅឱ្យប្រទេសយួនដោយអាងអំណាចខ្លួនជាអាណាព្យាបាលត្រួតត្រាលើប្រទេសទាំង៣ខ្មែរ លាវ យួន នៅពេលនោះ។

ការវាយប្រយុទ្ធគ្នាយ៉ាងសាហាវឃោឃៅស៊ើរស៊ីសាច់ហុតឈាមនេះ បណ្តាលឱ្យមេដឹកនាំប្រទេសយួនខាងត្បូង ដែលមាននិន្នការទៅខាងលោកសេរី ត្រូវតែរិះរកជំនួយពីប្រទេសលោកសេរី ជាអ្នកជួយការពារសិទ្ធិសេរីភាពនៃប្រជាពលរដ្ឋទាំងអស់នៅក្នុងលោក ទើបសម្រេចចិត្តបញ្ជូនកងទ័ព និងយុទ្ធោបករណ៍គ្រប់ប្រភេទ និងគ្រប់ធន់ចូលមកវាយប្រយុទ្ធទប់ទល់និងកងទ័ពព្រៃយួនយៀកកុងយ៉ាងពេញទំហឹងដែរ បណ្តាលឱ្យមានការបាត់បង់ជីវិត និងខូចខាតសម្ភារៈយ៉ាងច្រើនសន្ធឹកសន្ធាប់ទាំងសងខាង ។

ភ្លើងសង្គ្រាមចេះតែឆេះសន្ធោសន្ធៅឡើងទាំងយប់ទាំងថ្ងៃ គ្មានពេលស្រាកស្រាន្តទេ នៅពេលនោះហើយស្រាប់តែគេឃើញកងទ័ពព្រៃយួនយៀកកុងទាំងកងៗ បានធ្វើដំណើរចុះមកពីប្រទេសយួនខាងជើងតាមផ្លូវលំសម្ងាត់ ឈ្មោះ ហូជីមិញ កាត់តាមប្រទេសលាវ និងកាត់តាមប្រទេសខ្មែរភាគខាងជើង ថែមទាំងមានដឹកជញ្ជូនគ្រឿងអាវុធ គ្រប់រំសេវ និងស្បៀងអាហារ ថ្នាំពេទ្យមកជាបន្តបន្ទាប់ដែរ ។

## សង្គ្រាមរាលដាលចូលប្រទេសខ្មែរ

សកម្មភាពវាយប្រយុទ្ធគ្នារវាងកងទ័ពព្រៃយួនយៀកកុង និងកងទ័ពយួនសេរី បានបណ្តាលឱ្យមានការប៉ះពាល់ដល់សន្តិសុខរបស់ប្រជាពលរដ្ឋខ្មែរនៅតាមបណ្តោយជាយដែនខ្មែរ-យួន ដែលមានភូមិ និងស្រែចំការប្រកបមុខរបរប្រចាំថ្ងៃ សម្រាប់ចិញ្ចឹមជីវិត និងប៉ះពាល់ដល់ការយាមល្បាតត្រួតពិនិត្យព្រំដែនរបស់កងទ័ពជាតិខ្មែរ ដើម្បីថែរក្សាសន្តិសុខប្រជាពលរដ្ឋ និងព្រំដែន ។ មិនតែប៉ុណ្ណោះ កងទ័ពព្រៃយួនយៀកកុង បានយកទឹកដីខ្មែរ ជិតព្រំដែនធ្វើជាទីតាំងបង្អែកសំរាប់កងទ័ពព្រៃរបស់ខ្លួនទៀតផង ។ ជាពិសេសបំផុតទៅទៀត កងទ័ពព្រៃយួនយៀកកុង មានលុយខ្មែរ ក្រដាស់៥០០រៀល រូបគោថ្មីៗ យកមកប្រើប្រាស់ទិញផលិតផលគ្រប់ប្រភេទពីប្រជាពលរដ្ឋខ្មែរ ដោយពុំដឹងថា តើលុយខ្មែរថ្មីៗនេះបានមកពីណា?



លុះក្រោយមកទើបប្រទេសខ្មែរ បានរកឃើញថា យួនយៀកកុង បានបោះពុម្ពលុយ៥០០រៀលក្លែងក្លាយមកចាយ បណ្តាលឱ្យសេដ្ឋកិច្ចខ្មែរ ត្រូវធ្លាក់ចុះស្មើរតែដល់សូន្យ។

នៅក្នុងសង្គមប្រទេសយួននេះ ឃើញមានសកម្មភាពមួយដែលផ្ទុយគោលបំណងរបស់សន្ធិសញ្ញាអន្តរជាតិ ដែលចែងពីការតំកល់ខ្លួនឱ្យនៅក្នុងភាពជាប្រទេសអព្យាក្រិត្យឥតលំអៀងអស់ទៅហើយ ដោយសារនៅពេលនោះមានគណកម្មាធិការត្រួតពិនិត្យអន្តរជាតិមួយ បានតែងតាំងឡើងមានសមាជិក៣ប្រទេស គឺ កាណាដា តំណាងឱ្យលោកសេរី ។

(សូមរង់ចាំអានបន្តនៅលេខក្រោយទៀត)

# អាថ៌កំបាំង និងសិល្បៈនៃជីវិត
# SECRET AND ART OF LIVING



(តមកពីលេខមុន)

រៀបរៀងដោយ
លោក ម៉ៅ ច័ន្ទសំណុំ

●ជាក់ស្តែងមួយទៀត បើកំហឹងកំពុងផុះឡើង ហើយអ្នកអាចពិនិត្យវាបាននោះ អ្នកលែងដើរតួជាកំហឹងនោះទៀតហើយ ។ កំហឹងលែងនៅទុំលើអ្នកទៀតឡើយ វាត្រូវរលាយរូបសាបសូន្យជាលំដាប់ប្រៀបដូចអាប់រលាយបាត់ក្រោមពន្លឺព្រះអាទិត្យដូច្នោះឯង ។ គ្រាប់ពូជកំហឹងដែលសម្ងំទុំក្នុងមេម៉ារីជាយូរលង់មកហើយក៏ត្រូវស្តារឱ្យងើបឡើងមកផ្ទៃលើ ហើយត្រូវវិនាសអន្តរាយជាបន្តបន្ទាប់ ។ នេះជាឧបករណ៍មួយដែលសមាធិវិបស្សនាជួយអ្នកប្រតិបត្តិឱ្យរួចរដោះពីពិសពុលនៃផ្លូវចិត្តសព្វយ៉ាង ។ អ្នកកើតទុក្ខក្រៀមក្រំ អ្នកមានជម្ងឺផ្លូវចិត្ត អ្នកមានកង្វល់ស្រ្តេះ អ្នកមានភាពអួលណែន ឬអាប់អួរក្នុងចិត្តត្រូវបានរួចរំដោះតាមឧបករណ៍ដ៏អស្ចារ្យនេះ ។ សូមអ្នកកុំជឿខ្ញុំចូរពិសោធន៍ដោយខ្លួនឯងចុះទើបឃើញច្បាស់ ។ គោលការណ៍ស្រាវជ្រាវយ៉ាងល្អិតល្អន់នេះដំបូងឡើយយើងហាត់បណ្តុះវានៅពេលយើងអង្គុយសមាធិ (Formal meditation ) លុះហាត់យូរៗទៅរបៀបប្រតិបត្តិនេះវានឹងហៀរមកក្នុងក្របខណ្ឌជីវិតជាក់ស្តែងពីមួយខណៈទៅមួយខណៈ (Moment by moment) លទ្ធផលសមាធិនឹងបានស៊ីជំរៅក្នុងជីវិតជាក់ស្តែង (រូបភាពនៃជីវិតអ្នកប្រតិបត្តិបានទទួលការផ្លាស់ប្តូរជាវិជ្ជមាន និងពិតប្រាកដ) ។

**១១-ការដាក់ចិត្ត ដាក់កាយថ្វាយព្រះពុទ្ធ ព្រះធម៌ និងព្រះសង្ឃ :**

ការថ្វាយកាយនិងចិត្តដល់ព្រះពុទ្ធ ព្រះធម៌ ព្រះសង្ឃជាលក្ខខណ្ឌចាំបាច់ពុំអាចខ្វះបាន ពីព្រោះការប្រតិបត្តិដូច្នេះមានន័យថា អ្នកហ៊ានលះបង់បុគ្គលតូចចង្អៀត (small ego, personality) (ដែលឋិតនៅក្រោមដង្ហៀបមេម៉ារី) បើកផ្លូវនិងឈានទៅពិសោធន៍ខឿនកុងស្សនិសបរិសុទ្ធ ដែលមានកប់ក្នុងខ្លួនយើងម្នាក់ៗ ។ ដូច្នេះហើយបានជាយើងកត់សំគាល់ឃើញព្រះសង្ឃ ពុទ្ធបរិស័ទតែងប្រារព្ធកិច្ចដុតធូប ទៀនថ្វាយបង្គំ និងរំលឹកគុណតេជៈព្រះពុទ្ធ ព្រះធម៌ ព្រះសង្ឃ ។ ពិធីនេះពិតជាមានបង្កប់អត្ថន័យថ្វាយកាយនិងចិត្តចំពោះព្រះរតនត្រ័យទាំងបីនេះ ។ម្យ៉ាងទៀតសូមជំរះមន្ទិលសង្ស័យរបស់បុគ្គលមួយចំនួន ដែលពោលថា «ការថ្វាយកាយចិត្តដូច្នេះគឺជាការប្រតិបត្តិអបីយជំនឿ » និង «ការថ្វាយកាយចិត្តដូច្នេះនាំឱ្យយើងបាត់បង់សេរីភាពបុគ្គល ហើយជាអំពើឆោតល្ងង់» ។ ខ្ញុំធ្លាប់ទទួលមេរៀនជាក់ស្តែងអំពីប្រការនេះ ។ ពេលខ្ញុំហាត់សមាធិវិបស្សនាដំបូង ខ្ញុំបានឃើញការរួចរដោះពិតៗ ។ ខ្ញុំមានអំនួតណាស់ក៏សំរេចក្នុងចិត្តថា ថ្ងៃក្រោយនឹងខិតខំសំរេចឱ្យខ្ពស់ជាងនេះទៅទៀត ។ បន្ទាប់មកខ្ញុំបានចូលរួមហាត់នៅមណ្ឌលវិបស្សនាជាលើកទី២ ។ លើកនេះខ្ញុំបានខិតខំប្រើគ្រប់មធ្យោបាយទាំងអស់ដែលខ្លួនមាន ដូចជាការផ្លាស់ប្តូររបៀបមើលដង្ហើមច្រើនបែបច្រើនយ៉ាងផ្លាស់ប្តូររបៀបអង្គុយគ្រប់យ៉ាង ។ ទោះខ្ញុំខិតខំយ៉ាងណាក៏ពុំទៅមុខ វិលចុះវិលឡើង ជ្រុំជើងនៅដដែលៗថ្ងៃទី៨កន្លងទៅហើយ (ក្នុងកម្មវិធីសមាធិវិបស្សនា ១០ថ្ងៃ) គ្មានលទ្ធផលទាល់តែសោះ ។ គាប់ជួនសំណាងល្អ ខ្ញុំមានភារៈបកប្រែភាសាឱ្យប្រពន្ធខ្ញុំ ។ ប្រពន្ធខ្ញុំសួរថា «ឯងបានសំរេចបានលទ្ធផលប៉ុន្មានដែរ?» ។ ខ្ញុំរាយរាប់ប្រាប់ប្រពន្ធខ្ញុំអំពីភាពទាល់ច្រកដែលខ្ញុំកំពុងប្រឈម ។ នាងនិយាយឆ្លើយមកកាន់ខ្ញុំថា « ចូរឯងកុំគិតចង់បានអ្វីទាំងអស់ គិតតែអនុវត្តតាមការណែនាំហើយ លទ្ធផលយ៉ាងណានោះ ទុកឱ្យព្រះធម៌ចាត់ចែងទៅចុះ!!!!» ។ អស្ចារ្យណាស់ដោយបានទទួលពាក្យគន្លឹះមួយឃ្លានេះ លុះត្រឡប់មកអង្គុយវិញ ភាពស្ងប់បានចូលមកសន្ថិតលើកាយនិងចិត្តខ្ញុំយ៉ាងពិតប្រាកដ ខ្ញុំទទួលបានលទ្ធផលដ៏អស្ចារ្យពេលនោះ ។ មេរៀនដែលគួរចងចាំមានដូចតទៅ :

(1) សមាធិនិងការរស់នៅខុសគ្នា : ក្នុងការរស់នៅជាក់ស្តែង មនុស្សត្រូវប្រព្រឹត្តទៅក្រោមទិសដៅនិងគោលបំណងណាមួយ ដោយក្នុងនោះ គេមើលឃើញលទ្ធផលតាមការស្រម៍យទុកជាមុន ថានឹងមានអ្វីកើតឡើងចំពោះខ្លួននឹងសំរេចបាននេះបាននោះ ។ ក្នុងការងារសមាធិ គោលបំណងមានដូចគ្នា ពោលគឺចង់សំរេចឱ្យបានការរួចរដោះភាពស្ងប់ក្នុងចិត្ត ។ ប៉ុន្តែនៅពេលប្រតិបត្តិផ្ទាល់មនុស្សត្រូវចេះទុកដាក់ទិសដៅនិងគោលបំណងនេះមួយអន្លើ និងលទ្ធផលក៏ទុកដាក់មួយអន្លើដែរ ត្រូវគិតគូរ និងធ្វើតែកិច្ចការដែលត្រូវអនុវត្តនៅចំពោះមុខបានហើយ ។ មានន័យថា ប្រតិបត្តិដោយពុំនឹកនាចង់បានអ្វីឡើយ (Practice meditation without desiring the goals and results) ។ នេះជាគន្លឹះមូលដ្ឋានបំផុត ដើម្បីសំរេចទិសដៅសមាធិ ។

(2) ដើម្បីឱ្យគោលការណ៍ «ប្រតិបត្តិដោយពុំនឹកនាចង់បានអ្វីឡើយ» ដើរទៅរួចមនុស្សត្រូវចេះកែប្រែឥរិយាបថនៅពេលតាំងសមាធិ ដោយយកឧបករណ៍ «ចូរធ្វើតាមតែការណែនាំបានហើយ!!! ចំណែកឯលទ្ធផលទុកឱ្យព្រះធម៌ចាត់ចែងទៅចុះ» ។ អាថ៌កំបាំងនៅពីក្រោយនោះ គឺមនុស្សហាត់ ឬបណ្តុះឥរិយាបថរស់នៅក្រៅប្រព័ន្ធមេម៉ារីបុគ្គល (Ego of mind) ។ ជាធម្មតាអ្នកប្រតិបត្តិតែងធ្លាក់ទៅក្នុងឥរិយាបថអាត្មាអញតាំងសមាធិសំដៅឱ្យបានសំរេចជាអ្នកត្រាស់ដឹង, រួចកម្មពៀរ, ឡើងឋានសួរ, បានសំរេចព្រះនិព្វាន, អ្នកខ្លាំង (ទាំងនេះជាទម្លាប់ប្រតិកម្មចាស់) ។ល។ បើឥរិយាបថបែបនេះកើតមានក្នុងខ្លួនហើយ អ្នកប្រតិបត្តិត្រូវឋិតនៅវិលវល់ (រកច្រកចេញពុំរួច) ក្រោមក្រញាំដែករបស់បុគ្គលខ្លួន ហើយសមាធិលែងឈានទៅមុខ ។

ក្នុងចំណុចនេះ សូមកុំជឿលើពាក្យពេចន៍ខ្ញុំអធិប្បាយ ។ សូមអនុវត្តពិសោធន៍ផ្ទាល់ខ្លួននឹងឃើញជាក់ស្តែងពុំខានឡើយ ។ បើអ្នកចាប់ផ្តើមអង្គុយសមាធិ ហើយពុំប្រារព្ធទំរង់ការតូចនេះ (ពិធីប្រគល់កាយនិងចិត្តដល់ព្រះរតនត្រ័យ) អ្នកពិតជានៅវិលវល់ក្នុងប្រអប់មេម៉ារីនេះឯង ទៅមុខពុំរួច ថយក្រោយពុំរួច កើតការធុញថប់រហូតដល់បោះបង់ចោលការប្រតិបត្តិសមាធិទៀតផង ។

(តទៅលេខក្រោយទៀត)



# ជោគជតារាសីទាំង១២ប្រចាំឆ្នាំថោះ






រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកប កិច្ចការងារអ្វីក៏ដោយ គឺរមែងតែងតែបានទទួលផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់ ។ ក្នុងរយៈពេលនេះ បុរសត្រូវប្រយ័ត្នចំពោះមនុស្សស្រីដែលមានសម្ដីផ្អែមអាចរលាយទ្រព្យធាប់ ។ ចំពោះគូស្នេហ៍ប្រកបតែសេចក្ដីសុខក្សេមក្សាន្ត ។




រាសីលោកអ្នកល្មមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះថ្វីត្បិតតែការងាររកស៊ីអាចរើប ៗបន្តិចឡើងវិញក្ដី តែអ្វីដែលលោកអ្នកគួរប្រយ័ត្នប្រយែងនោះ គឺនឹងមានមនុស្សសម្ដីផ្អែមបង់ឆោកប្រាស់តាមគ្រប់រូបភាព ដូច្នេះទាំងបុរសស្ត្រី គឺមិនត្រូវធាប់ត្រចៀកទន់ជឿទុកចិត្តគេពេកទេ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះប្រកបតែសេចក្ដីសុខនឹងគ្នា ។




រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះអ្វី ៗច្រើនមានការប្រែប្រួលពុំទៀងទាត់ឡើយ ។ ដូច្នេះបើលោកអ្នកមានទិញលក់ដីធ្លីផ្ទះ ឬវត្ថុមានតម្លៃផ្សេង ៗ ចូរធ្វើលិខិតស្នាមដោយមានចុះហត្ថលេខា ឬផ្ដិតស្នាមមេដៃឲ្យបានត្រឹមត្រូវទើបទៅថ្ងៃមុខពុំមានបញ្ហាចោទឡើង ។ ចំពោះគូស្នេហ៍ប្រកបតែសេចក្ដីសុខក្សេមក្សាន្ត ។




រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូររៀបចំគម្រោងផែនការជាមុនទើបពុំមានការថ្លោះធ្លោយ ។ ក្រៅពីនោះបើមានរឿងឈ្លោះវិវាទកើតឡើង ចូរចេះអត់ធ្មត់ និងរម្ងាប់ចិត្តឲ្យបានត្រជាក់ទើបរឿងតូចមិនអាចក្លាយជារឿងធំបាន ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះច្រើនពាក់មុខយក្សដាក់គ្នា ។




រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូរកុំធ្វេសប្រហែសឲ្យសោះ ជាពិសេសចំពោះអាជីវករអ្នករកស៊ីលក់ដូរមុននឹងប្រគល់ ឬទទួលនូវមុខទំនិញសព្វសាររពើ ចូរចេះពិនិត្យមើលគុណភាព និងរាប់ចំនួនឲ្យបានត្រឹមត្រូវ ។ ចំពោះគូស្វាមីភរិយា ចូរប្រយ័ត្នអ្នកក្រៅមកញុះញង់ ។




រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះខចអ្វី ៗច្រើនមានការប្រែប្រួលពុំទៀងទាត់ឡើយ ដូច្នេះបើលោកអ្នកមានលក់ដីធ្លីផ្ទះសម្បែង ឬវត្ថុមានតម្លៃផ្សេង ៗ ចូរធ្វើលិខិតស្នាមជាលាយល័ក្ខណ៍អក្សរដោយមានចុះហត្ថលេខា ឬផ្ដិតស្នាមមេដៃឲ្យបានត្រឹមត្រូវទើបទៅថ្ងៃមុខពុំមានបញ្ហាចោទឡើង ។ ចំពោះគូស្នេហ៍មានភាពស្និទ្ធស្នាលដូចប្រក្រតី ។




រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ បើមានរឿងឈ្លោះវិវាទកើតឡើង ចូរចេះអត់ធ្មត់ និងរម្ងាប់ចិត្តឲ្យបានត្រជាក់ ។ ចំពោះស្ត្រីភេទក្នុងរយៈពេលនេះមិនត្រូវនិយាយស្ដីប៉ប៉ាច់ប៉ប៉ោចឥតបានការច្រើនពេកទេ ព្រោះរឿងរ៉ាវផ្សេង ៗអាចកើតចេញពីពាក្យសម្ដី ។ ចំពោះគូស្វាមីភរិយាចូរប្រយ័ត្នប្រយែងក្រែងមានអ្នកទីបីចូលជ្រៀតជ្រែក ។




រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែមានភោគផលចំណូលហូរចូលច្រើនគួរសមក្ដី តែពុំមានសល់អ្វីជាដុំកំភួនឡើយ ព្រោះចាយវាយខ្ជះខ្ជាយខ្លាំងពេក ហើយក៏មិនខុសពីទូកធំក្ដោងធំនោះដែរ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះទាល់តែចេះអត់ឱនឲ្យគ្នាទៅវិញទៅមកទើបមិនអាចប្រេះឆាគ្នាបាន ។




រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹម ៗ ។ ក្នុងរយៈពេលនេះដោយទំនាយទាយថា អាចបង់ខាតទ្រព្យខ្លះ ៗនោះ ដូច្នេះចូរកុំឲ្យគេខ្ចីរបស់របរមានតម្លៃឲ្យសោះ ព្រោះកាលបើបានធ្លាក់ដល់ដៃគេហើយ គឺគ្មានថ្ងៃបានវិលត្រឡប់វិញឡើយ ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះមានផលប៉ះទង្គិចគ្នាបន្តិចបន្តួច ។




រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ គឺអាចទទួលបានផលសម្រេចត្រឹមតែពាក់កណ្ដាលប៉ុណ្ណោះ ដូច្នេះលោកអ្នកមិនត្រូវហ៊ានប្រថុយប្រថានបណ្ដាក់ទុនរកស៊ីដោយទ្រង់ទ្រាយធំឡើយ ។ ចំពោះគូស្នេហ៍មានភាពស្និទ្ធស្នាលដូចសព្វមួយដង ។




រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ លោកអ្នកមានអារម្មណ៍ភ្លឺថ្លាគំនិតប្រាជ្ញាឈ្លាសវៃ ទោះបានប្រកបកិច្ចការងារអ្វី ៗក៏ដោយ ក៏អាចទទួលបានផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់ តែចូរកុំមានចិត្តលោភលន់ឲ្យសោះ ព្រោះការលោភលន់នាំមកនូវក្ដីវិនាសអន្តរាយ ។ ចំពោះគូស្នេហ៍មានភាពល្អកល្អិនយល់ចិត្តគ្នាល្អណាស់ ។




រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែការងាររកស៊ីរបស់លោកអ្នកបានជួបនឹងគូប្រជែងដេញខ្លាំងយ៉ាងណាក្ដីក៏មិនភ័យព្រួយអ្វីដែរ ព្រោះលោកអ្នកមានប្រៀបឈ្នះជាប់ជានិច្ច ។ ចំពោះកំលោះក្រមុំក្នុងរយៈពេលនេះអាចទាក់ទងគ្នានឹងបានក្លាយជាគូស្នេហ៍ដ៏ប្រពៃមួយគូ ។




## វិធីថែបំប៉នសរសៃសក់រស់រវើក

●នៅក្នុងផ្លែត្រសក់ គឺសម្បូរទៅដោយសារជាតិម៉យជីរ៉ែសឺរ បែបធម្មជាតិ ចំណែកទឹកដោះគោជូរវិញជួយឲ្យសរសៃសក់មានទម្ងន់ រីឯទឹកឃ្មុំជួយឲ្យសរសៃសក់ឡើងខ្មៅរលើបរលោង ។

នៅក្នុងថ្ងៃឈប់សម្រាក បើអ្នកមិនចង់ចេញទៅក្រៅផ្ទះ ព្រោះចង់សន្សំប្រាក់នោះ យើងណែនាំដើម្បីថែបំប៉នឲ្យសក់ស្រស់ស្អាតដោយដៃខ្លួនឯងដូចខាងក្រោមនេះ :

**គ្រឿងផ្សំ :**

●ផ្លែត្រសក់ហាន់ជាចំណិត១ផ្លែ
●ទឹកដោះជូររសជាតិធម្មជាតិ១កែវ
●ទឹកឃ្មុំ៣ស្លាបព្រាបាយ

**វិធីធ្វើ :**

១-ដាក់គ្រឿងផ្សំទាំងអស់ទៅក្នុងឧបករណ៍ក្រឡុករហូតដល់រលាយចូលសាច់តែមួយ ។

២-ប្រើល្បាយដែលក្រឡុកបាននេះ យកទៅលាបឲ្យសព្វតាំងពីគល់សក់រហូតដល់ចុងសក់ ។

៣-យកកន្សែងពោះគោជ្រលក់ទឹកក្ដៅបន្តិច រួចពូតឲ្យនៅស្រពាប់ បន្ទាប់មកយកមកឃ្លុំលើក្បាលទុកចោលប្រមាណជា២០នាទី ។

៤-លាងទឹកចេញឲ្យស្អាតកក់សក់ធម្មតា ។

រូបមន្តដើម្បីឲ្យសក់ស្អាតនេះ ប្រសិនបើបានធ្វើក្នុងមួយសប្ដាហ៍ម្ដង អ្នកនឹងមានអារម្មណ៍ប្លែកប្រែប្រួលពិសេសអ្នកដែលមានបញ្ហាសរសៃសក់ស្ងួត ហើយប្រយោជន៍ដែលទទួលបាន គឺធ្វើឲ្យសរសៃសក់មានភាពរស់រវើកដូចធម្មជាតិគួរឲ្យចង់អង្អែល ហើយស្បែកក្បាលត្រជាក់ស្រួលទៀតផង ។

នៅមានចំណុចពិសេសមួយទៀត គឺក្លិនដ៏ក្រអូបស្រទន់ពីផ្លែត្រសក់ជាប់នៅនឹងសរសៃសក់បានយូរថ្ងៃទៀតផង៕

## ស្បែកស្អាតដោយមិនបាច់ចំនាយខ្ជះខ្ជាយ



●រូបមន្តសន្សំសំចៃថវិកាពេលនេះ ប្រាកដគេចមិនផុតពីការយកចិត្តទុកដាក់នៅលើស្បែកត្រង់ជើងនោះទេ ព្រោះចំណុចមួយនេះជាចំណែកមួយដែលមនុស្សភាគច្រើននាំគ្នាមើលរំលងក្នុងការថែរក្សា រហូតបណ្ដែតបណ្ដោយឲ្យក្រៀមស្ងួតប្រេះស្បែកទើបប្រញាប់ប្រញាល់ងាកមកយកចិត្តទុកដាក់នៅពេលក្រោយ ។ ផលអាក្រក់វិញ គឺប្រសិនបើជើងរបស់អ្នកមិនទទួលបានការថែបំប៉នអស់រយៈពេលយូរឱកាសដែលអាចធ្វើឲ្យស្បែកត្រឡប់មកមានសភាពទន់ល្មើយបានដូចដើមឡើងវិញនោះទាមទារឲ្យចំណាយពេលយូរ ។

វិធីណែនាំគឺតម្រូវឲ្យត្រៀមអង្ករអូដ្ឋ១វែកសម្លជាមួយនឹងទឹកក្រូចឆ្មារមួយផ្លែចាក់លាយចូលគ្នាកូរឲ្យសព្វ រួចនាំយកទៅលាបបំពោកលើជើងចាប់ពីកជើងរហូតដល់បាតជើង ។ បន្ទាប់មកទៀតពុះក្រូចឆ្មារមួយចំហៀងផ្លែយកទៅត្រដុសត្រង់កែងជើងដែលជាស្បែកក្រិនដោយទុកចោលពី៥-១០នាទី ទើបប្រើទឹកក្ដៅឧណ្ហ ៗលាងជម្រះ និងលាងម្ដងទៀតដោយទឹកត្រជាក់ជូតឲ្យស្ងួត ។ ជាចុងក្រោយត្រូវលាបផលិតផលម៉យចឺរ៉ាយសឺដោយត្រូវលាបឲ្យច្រើននៅត្រង់ស្បែកក្រិន ។ ប្រសិនអាចធ្វើបានរាល់ថ្ងៃ ស្បែកដែលក្រិននឹងទន់ល្មើយឡើងវិញមិនខាន ៕

## របៀបឈប់បំបាត់ស្នាមជ្រួញលើផ្ទៃមុខ

ការដែលមានស្នាមជ្រីវជ្រួញនៅលើផ្ទៃមុខ គឺជាកង្វល់មួយយ៉ាងធំក៏ថាបាន ដែលធ្វើឲ្យមនុស្សមួយចំនួនមើលទៅចាប់ចាស់ជាងវ័យ ។ ដូចនេះយើងមានវិធីឲ្យអ្នកអាចម៉ាស្សាដើម្បីការពារស្នាមជ្រីវជ្រួញនៅលើផ្ទៃមុខដោយខ្លួនឯងផ្ទាល់បានដោយងាយ ៗដូចតទៅ :

**-បរិវេណជុំវិញភ្នែក :** ត្រូវប្រើម្រាម៤ម៉ាស្សាត្រង់ថ្ងាសពីក្រោមឡើងលើឆ្លាស់ដៃម្ដងឆ្វេងម្ដងស្ដាំម្នាង៣ដង ។

**-បរិវេណបបូរមាត់ :** ប្រើម្រាម៤ដាក់ត្រង់ចុងចង្កាម៉ាស្សាលញ់ថ្នម ៗ រហូតដល់ត្រចៀក៣ដង ។

**-ការចុចចំណុច :** ប្រើម្រាមកណ្ដាលចុចលើចំណុចដែលការពារការកើតស្នាមជ្រីញជ្រួញដោយចុចសន្សឹម ៗ រួចត្រូវបន្ធូរដោយសន្សឹម ៗ ៕

# ទង់ជាតិខ្មែរបានត្រូវលើកឡើងម្តងទៀតនៅលីន

**លីន :** សហគមន៍ខ្មែរនៅលីន រដ្ឋម៉ាសាឈូសែត បានទទួលកិត្តិយសដោយសាលាក្រុងលីន បានរៀបចំលើកទង់ជាតិខ្មែរឡើងនាឱកាសចូលឆ្នាំខ្មែរ ថ្ងៃទី២៩ ខែមេសា ឆ្នាំ២០១១នេះ។ នេះជាឆ្នាំទីពីរហើយដែលសាលាក្រុងនេះឱ្យសញ្ញាពីការយកចិត្តទុកដាក់របស់អ្នកគ្រប់គ្រងចំពោះសមាជិកសហគមន៍ខ្លួន ដែលមានដើមកំណើរជាខ្មែរ ដែលមានចំនួនប្រមាណមួយម៉ឺនប្រាំពាន់នាក់រស់នៅទីនោះ ។

លោកស្រីអភិបាលក្រុង យូឌិត ហ្វ្លាណាគ្គន កិណ្ណីឌី បានឱ្យដឹងពីបំណងជួបសមាជិកទីក្រុងលីន ឱ្យបានច្រើនផង ដោយបង្កើតបរិយាកាស "ជួបគ្នាពិសារតែជាមួយអភិបាលក្រុង" ទៀតផង ។ សកម្មភាពនេះបានត្រូវគេទទួលស្គាល់ស្នាដៃរបស់លោក គីរីរដ្ឋ សាំង ដែលដើរតួជាទូតគោចររបស់លោកស្រីអភិបាលក្រុងក្នុងការភ្ជាប់ទំនាក់ទំនងពលរដ្ឋខ្មែរ និងសាលាក្រុងរបស់ខ្លួនបានយ៉ាងប្រសើរ ។



## Cambodian Flag Raised in Lynn Mass

*-By Audria Chea*

Lynn Mass — Mayor Judith Flanagan Kennedy held a Cambodian Flag Raising on April 29th, 2011 to honor the Cambodian New Year Celebration. There were approximately 100 Cambodians from local resident attended and sang the Cambodian National Anthem song.

Kirirath Saing, Director of the Department of Interpretive Services and Community Outreach at Union Hospital and an Ambassador to the Mayor's office, has worked with Mayor Judith Flanagan Kennedy last year to have the Cambodian Flag raised at the City Hall Square for the first time since the growing Cambodian community in the city for the last 20 years. This first commemoration took placed on April 24th, 2010. The Cambodian Buddhist monks from Wat Sanghikaram of Lynn also had joined chanting and offering the blessing to the flag was being raised and the observers at the event.



Saing said "The mayor is very approachable. Seeing us and our community happy makes her happy." He continued, "She is the first mayor in Lynn who is so open to doing something new that never been done by others before her." Saing reassured that he and Mayor Kennedy have more plans for the future to create the link between the community and the mayor's office, "one of the events include having tea with the mayor at the City Hall."







The biweekly NEWSPAPER that CONNECTS YOU with the CAMBODIAN COMMUNITIES LOCALLY and NATIONALLY. Found in 2007. Now Serving in Pennsylvania, New Jersey, Rhode Island, Massachusetts, and mailing subscriptions to across U.S. Canada, & France.
Advertising Depart. Mrs. Soben Pin, Vice President, 267-253-3947/
KhmerPostUSA@gmail.com
Mr. Sam Khoeun, Sale Consultant, 781.244.0522